


ខ្មែរប៉ុស្ដិ៍ ស.រ.អា KhmerPost USA
Printing The Cambodian World News
VOL. 05 ISSUE 73 DEC. 03th – 23th, 2010

មាតិការឿង | ទំព័រ



# ទង់ជាតិខ្មែរហូតឡើងហើយ នៅហ្វីឡាដែលហ្វៀ

**ហ្វីឡាដែលហ្វៀ** : ព្រឹកថ្ងៃសុក្រ ទី១៩ ខែវិច្ឆិកា ឆ្នាំ២០១០ ទង់ជាតិខ្មែរ បានចាប់ផ្ដើមបង្ហូតជាលើកដំបូងបង្អស់នៅលើមហាពិធីដ៏សំខាន់មួយ នាទីក្រុងហ្វីឡាដែលហ្វៀ ក្នុងចំពោះទង់តំណាងជាតិរាប់រយ ដែលបកជាប្រចាំនៅលើមហាពិធីនោះ ជាយូរឆ្នាំមកហើយ។ រាប់ទាំងទង់ជាតិខ្មែរផង ជាទង់ជាតិថ្មីតំណាងឱ្យប្រជាជាតិចំនួន ១៩ បានត្រូវតម្លើងជាមួយគ្នា។

ប្រជាពលរដ្ឋខ្មែរប្រមាណ ១០០នាក់ ចូលរួមដោយព្រះគ្រូចៅអធិការវត្តព្រះពុទ្ធវង្សី គឺព្រះអង្គ វឌ្ឍមុនី និងលោកឯកអគ្គរាជទូតខ្មែរប្រចាំសហរដ្ឋអាមេរិក គឺលោក ហែម ហេង ជាគណាធិបតីខ្មែរ បានមកសំដែងការអបអរសាទរនឹងពិធីតម្លើងទង់ជាតិខ្មែរថ្មី ហើយនឹងការចូលសញ្ជាតិជាពលរដ្ឋថ្មីរបស់សហរដ្ឋអាមេរិកនៅកណ្ដាលផ្លូវដ៏ធំទូលាយ និងល្បីល្បាយបំផុតរបស់ហ្វីឡាដែលហ្វៀ គឺមហាវិថី Benjamen Franklin Parkway ។

លោក ម៉ាកិល ណាទ័រ បានថ្លែងក្នុងឱកាសសម្ពោធនោះថា "សាលាក្រុង និងពលរដ្ឋអាមេរិកាំងបានដឹងឮ នឹងទទួលស្គាល់ប្រជាជនភាគតិចទាំងអស់

(តទៅទំព័រទី ១០)



# សោកនាដកម្មនៅលើស្ពានពេជ្រ ថ្ងៃសប្បាយក្លាយជាថ្ងៃកាន់ទុក្ខ



•••សំលេងដង្ហោយហៅរបស់ជនរងគ្រោះមុនផុតដង្ហើម "ជួយកូនខ្ញុំផង! ជួយម៉ែខ្ញុំផង! ជួយប្អូនខ្ញុំផង!" បានដក់ជាប់ក្នុងអារម្មណ៍ជនជាតិខ្មែរឱ្យចងចាំនូវព្រឹត្តិការណ៍លើស្ពានពេជ្រនៃរមនីយដ្ឋានកោះពេជ្រក្នុងឧបទ្ទវហេតុរត់ជាន់គ្នា ដែលបានបណ្ដាលឱ្យយុវជនយុវនារីខ្មែរស្លាប់ភ្លាមៗនៅកន្លែងកើតហេតុចំនួន៣៥១នាក់យ៉ាងអនោចអធម ក្នុងនោះមានប្រុសចំនួន១២៩នាក់ ស្រីចំនួន២២២នាក់ និងអ្នករងរបួសចំនួន៣៩៥នាក់ទៀត កំពុងទទួលការព្យាបាលនៅមន្ទីរពេទ្យដោយឥតគិតថ្លៃ។ យោងតាមឯកសាររបស់ក្រសួងសង្គមកិច្ចការងារកំណត់ហេតុរបស់អ្នកស្លាប់មានចំនួន៣៤៧នាក់ កាលពីពេលថ្មីៗនេះចំនួនមនុស្សស្លាប់

(តទៅទំព័រទី ០៦)

# ល្ខោនហ៊ីបហុបលេងរឿងខ្មែរក្រហម

ដោយ អ៊ុំដារុង

**ឡូវែល :** គេធ្លាប់ឮតែល្ខោនបាសាក់ ឬល្ខោនយីកេ ឬល្ខោននិយាយបែបសម័យ...តែគេពុំដែលឃើញ"ល្ខោនហ៊ីបហុប"ហើយជាពិសេសល្ខោននេះសំដែងរឿងសោកនាដកម្មនៃរបបខ្មែរក្រហមថែមទៀតផង។ នេះជាលើកដំបូងហើយដែលយើងបានទស្សនាកាលពីរាត្រីថ្ងៃទី២១ ខែវិច្ឆិកា ឆ្នាំ២០១០ នៅភោជនីយដ្ឋានសំពៅមាស ក្រុងឡូវែល នាឱកាសពិធីបុណ្យប្រមូលបច្ច័យរបស់"សហគមន៍ខ្មែរសប្បុរសជន" នៅទស្សនីយភាពបែបល្ខោនសម័យមួយ មានតួសម្តែងបីរូប ដែលក្នុងនោះ តួអង្គសម្តែងបានប្រើចម្រៀងកាយវិការ ហ៊ីបហុប ដ៏ល្បីល្បាញតែក្នុងចំណោមយុវជនសម័យថ្មីមកកំដរសាច់រឿងទៅវិញ ដែលជាហេតុធ្វើឱ្យភ្ញៀវប្រមាណ៥០០នាក់ នៅទីនោះភាគច្រើនជាមនុស្សជំនាន់មុនមានការចម្លែកភ្នែកពុំដឹងត្រូវសរសើរឬទិទាននៅឡើយ។

ក្នុងរាត្រីនោះលោក ពត សុឃឿម Pot Sokhoeum ដែលជាអ្នកបង្កើតឱ្យមានជាការសំដែងបែប Hip Hop បានជ្រើសរើសសមាជិកក្នុងក្រុម Third World Entertainment របស់ខ្លួនចំនួន៣រូប គឺកញ្ញា ឌី អេលីសាបេត Dy Elizabeth លោក សម្បត្តិ ហ៊ី Sambath Hy និងលោក អេរិក ហេង Eric Heng មកសម្តែងជាឈុតអប់រំ ដែលមានរយៈពេលប្រមាណជា៨នាទី ដើម្បីទាក់ទាញចំណាប់អារម្មណ៍ពីភ្ញៀវដែលបានចូលរួម។ ដំបូងយុវជន Sambath និងកញ្ញា Dy Dlizabeth បានច្រៀងចំរៀង Hip Hop ផ្តោះផ្តងគ្នាដោយកោតសរសើរពីសម្បត្តិវប្បធម៌កេរដំណែលដូនតាខ្មែរ ដែលបានបន្សល់ទុកពីបុរាណកាលមក។ ប៉ុន្តែក្រោយមកលោក ហេង ដែលដើរតួជាកម្មាភិបាលខ្មែរក្រហមបានពង្រាត់អ្នកទាំងពីរ ហើយធ្វើបាបតាមរបៀបសាហាវយង់ឃ្នង ដោយបង្ខំឱ្យដោះអាវចងដៃទាំងពីរទៅខាងក្រោយ រួចហើយយកខ្សែចងទាក់ករ និងធ្វើទារុណកម្មយ៉ាងអមនុស្សធម៌ជាទីបំផុត។ ឈុតសំដែងលាយឡំការច្រៀងដោយទឹកភ្នែករបស់សម្បត្តិ ជាប្រជាជនរងគ្រោះបានធ្វើឱ្យទស្សនិកជនទាំងក្មេងទាំងចាស់មានការចាប់អារម្មណ៍មើលមិនដាក់ភ្នែកទាំងអ្នកឈរ និងអ្នកអង្គុយមានការស្រឡាំងកាំង ហើយរន្ធត់ហាក់បីដូចជាបានឃើញ និងឆ្លងកាត់សម័យបនប្រល័យពូជសាសន៍ខ្មែរក្រហម ៣ឆ្នាំ ៨ខែ ២០ថ្ងៃម្តងទៀត ។





គួររំលឹកដែរថា យើងធ្លាប់តែឮថា ចំរៀង Hip Hop គឺជាប្រភេទបទចំរៀងសម័យថ្មី ដែលសុទ្ធសឹងតែជាការនិយមចូលចិត្តពីស្រទាប់យុវជនតែប៉ុណ្ណោះ តែឥឡូវបទចំរៀង Hip Hop ដែលរៀបរាប់ពីសម័យខ្មែរក្រហមក្នុងទសវត្សរ៍៧០ បានធ្វើឱ្យយុវជនទូទៅ និងជាពិសេសខ្មែរវ័យចំណាស់ៗដែលភាគច្រើនជាជនជាតិ និងអណិកជនខ្មែរ-អាមេរិកកាំងបង្ហាញការពេញចិត្តក្រៃលែង។

ក្រុម Third World Entertainment បានពន្យល់ជុំវិញមូលហេតុដែលក្រុមនេះ បង្កើតឱ្យមានជាល្ខោន Hip Hop ខ្មែរក្រហមនេះឡើងព្រោះ "បទចំរៀង Hip Hop លាយឡំនិងកាយវិការកំសត់បែបនេះ គឺគោលបំណងដើម្បីដាសស្មារតីរំលឹកដល់កូនខ្មែរជំនាន់ក្រោយឱ្យយល់ដឹងពីរៀនជូរចត់ ដែលសម័យខ្មែរក្រហមបានធ្វើឱ្យប្រទេសកម្ពុជា ដែលធ្លាប់រុងរឿងក្លាយជាប្រទេសដ៏ខ្មៅងងឹត ឬហៅថាកម្ពុជាឆ្នាំសូន្យពីព្រោះរបបនេះ បានកាប់សម្លាប់ប្រជាជនខ្លួនឯងយ៉ាងព្រៃផ្សៃ ។ ព្រោះតែសម័យនោះ ម្ល៉េះយើងទាំងអស់គ្នា មិនព្រាតព្រាសនិរាសឃ្លាតឆ្ងាយពីប្រទេសកំណើតរបស់ខ្លួនទេ ។ ពួកយើងយល់ថា តាមរយៈអត្ថន័យនៃបទចំរៀងលាយឡំនិងកាយវិការនេះ គឺជាឧបករណ៍ដ៏សំខាន់មួយ ដែលអាចជួយទាក់ទាញអារម្មណ៍ដល់កូនខ្មែរជំនាន់ក្រោយបានយល់ដឹង ពោលគឺនេះជាស្ពានសម្រាប់តភ្ជាប់ទំនាក់ទំនងរវាងមនុស្សចាស់ និងក្មេងពីជំនាន់មួយទៅជំនាន់មួយ ឱ្យមានការយល់ដឹងដោយរៀនសូត្រពីគ្នាទៅវិញទៅមក ដើម្បីឱ្យសហគមន៍ខ្មែរឡូវែល និងប្រទេសកម្ពុជាយើងមានការរីកចំរើន ។ និយាយឱ្យចំគឺកុំឱ្យកម្ពុជាធ្លាក់ចូលក្នុងរបបបែបនេះ ឬស្ថិតក្រោមការត្រួតត្រាពីបរទេសណាមួយតទៅទៀត។

គួរឱ្យយើងចងចាំថា កម្ពុជាបានធ្លាក់ចូលក្នុងរបបប្រល័យពូជសាសន៍ខ្មែរក្រហមចាប់ពីឆ្នាំ១៩៧៥ និង១៩៧៩ ហើយរបបនេះបានសម្លាប់ប្រជាជនរបស់ខ្លួនអស់ប្រមាណ២លាននាក់ ។

សារមួយនេះក្រុម TWE បានប្រើបច្ចេកទេសដ៏ឆ្លាតវៃយ៉ាងថ្មីបំផុតសម្រាប់ពន្យល់ពីព្រឹត្តិការណ៍ចាស់ដល់មនុស្សជំនាន់ក្រោយ។

**សំគាល់ :** "ល្ខោន Hip Hop ខ្មែរក្រហម" សូមទាក់ទងទៅតាមលោក សម្បត្តិ ហេង **Sambath Heng (978)996-2939/967-6584.**

# Lynn Investigation on "Operation Melting Pot" lead to 37 arrested

លីន ជាតំបន់តូចមួយនៅមិនឆ្ងាយពីឡូវែលទេ តែមានសហគមន៍ខ្មែរប្រមាណ១ម៉ឺននាក់រស់នៅមានពាណិជ្ជករខ្មែរច្រើនគួរសម។ ថ្មីៗនេះក្រុមប៉ូលិស និងរដ្ឋអាជ្ញាបានចុះទៅធ្វេប្រតិបត្តិការក្នុងបេសកកម្មបំបែកសំបុកក្រុមជនអន្ធពាល (Gang) ក្នុងតំបន់ហើយបានឃាត់ខ្លួនជនសង្ស័យចំនួន ៣៧នាក់នៅក្នុងចំណោមអ្នកទាំងនោះ គេដឹងថាមានខ្មែរមួយចំនួនដែរ។

នៅក្នុងសេចក្តីរាយការណ៍របស់ **អគ្រា ជា** ថា : ប៉ូលិសបានធ្វើការចោទប្រកាន់មនុស្សដល់ ៤៨ ឯណោះ ពីបទប្រើប្រាស់អាវុធ និងលក់គ្រឿងញៀន។ ប៉ុន្តែមានការចាប់ខ្លួនតែ៣៧នាក់ប៉ុណ្ណោះ។ រដ្ឋអាជ្ញានៃក្រសួងយុត្តិធម៌ រដ្ឋម៉ាសាឈូសែត បានចេញនូវសេចក្តីប្រកាសកាលពីថ្ងៃទី ៥វិច្ឆិកានេះជាសាធារណៈថា "ជនជាប់ចោទនោះ មានជនភាគតិចច្រើនសញ្ជាតិ ដូចជា កូកាសាន, ក្រុមឡាទីណូ, ក្រុមអាស៊ី (ភាគច្រើនជាខ្មែរ) មានអាយុពី២០ដល់៣០ឆ្នាំ មានស្រី ហើយមានប្រុស ភាគច្រើនរស់នៅលីន តែមានខ្លះមកពីឡូវែល។

បេសកកម្មបំបែកសំបុក ប៉ូលិសបានធ្វើសកម្មភាពនៅផ្លូវឃីងគ្រីព ផ្លូវដីប្លូដ ផ្លូវដឺគ្លេងស្តា... ដើម្បីចាប់ពួកមេៗហ្គេង កូនចៅ និងអ្នកចូលដៃដែលជាទូទៅពួកនោះវាតទីតាំងរបស់ខ្លួននៅឡូវែល និង លីន។ ដោយសារឧក្រិដ្ឋកម្មដ៏ច្រើនតាំងពី១០ឆ្នាំមកហើយ បានត្រូវសាលា "លីនស្គូល" លើកមករៀបចំជាការប្រឡងស្នាដៃគំនូរពីក្រុងរបស់ខ្លួនឯង ដើម្បីទាក់ទាញពលរដ្ឋឱ្យចាប់អារម្មណ៍ពីសុវត្ថិភាពនៃទីក្រុងដែលខ្លួនរស់នៅ ។ ជ័យលាភីនៃគំនូរលើផ្ទាំង Poster បានត្រូវនិស្សិតបីរូប : ក្នុងនោះ សុម៉ារ៉ា សុន និង សេលីណាសុន ជាកូនខ្មែរ ។




The first week of November marked a serious gang raid in the Lynn and Lowell communities with a team of 500 law enforcement officers from both the local, state, and federal law enforcement department. The sweep lead to 48 charged with gun and drug trafficking offenses and 37 of these individuals were arrested.

Vandy, a resident of Lynn shared, "I didn't know much about the raid. Later on I learned that two people I knew ages 23 and 29 were among the people arrested in the gang raid in the early November." Another Lynn resident reported, "I heard that a Cambodian family was forced to leave their apartment after the gang raid and they have to appear in court." She continued, "It is sad because they are older people and they probably don't know what really happened and why they are being punished." Another source from the community stated the eviction letter issued to the Cambodian family was from the Lynn City Hall. The source also reported "The City Hall also threatens to penalize the property owner with a charge of $300 a day if he/she is not evicting and remove the family from the property." Khmer Post made an effort to access the Cambodian family who is being evicted, but was told they do not want to speak about the charged. A contact also made to the Lynn Major's office, but no respond for comment.

The United States Department of Justice-United States Attorney's office-District of Massachusetts listed a wide-rang of defendants' name and indictments in the Press Release on Friday, November 5, 2010. While the racial ethnic of the defendants were not disclosed, their name indicated that they are from a mixture group of Caucasian, Latino, and Asian, mainly Cambodian. The ages identified were between 20 to 30 years old with both male and female members. Most are residents of Lynn and a numbers are from Lowell.






The mixtures in ethnicities, sex, and ages, in the targeted sweep of gang members and associates lead the authorities to named the investigation "Operation Melting Pot". According to the statement in the November 5, 2010 Press Release, the Operation Melting Pot investigation targeted gang leaders, members, and associates among Avenue King Crips, the Bloods, the Gangsta Disciples, the Deuce Boyz, and the Latin Kings whose main territories based in Lynn and Lowell. The statement also stated that the Avenue King Crips and the Bloods have been involved in "violent war" for the past 10 years.

The gangs violent in Lynn instigate a poster contest by Lynn School whose students art work targeted gangs, racism, and violence in the city. The winning poster belongs to Marshall Middle School students, Somara Son, Saleena Son, and Janet Ezemba. Their art work demonstrated street gang members wearing bandanas and blue hats confronting the group in red clothing with handgun obtruding indicated deadly violence is about to erupt.

The top four posters are on display in the Major Judith Flanagan Kennedy's office. Others displayed the Lynn City Hall lobby.

# ទស្សនៈមតិ : ឧបទ្ទវហេតុលើស្ពានពេជ្រ

## តើនរណាជាអ្នកទទួលខុសត្រូវ?



ដោយ ម៉ម យីន

•••គួរឱ្យសោកស្តាយណាស់ នៅពេលបានឮសេចក្តីថ្លែងរបស់នាយករដ្ឋមន្ត្រីប្រមុខរដ្ឋាភិបាល បានប្រកាសទទួលស្គាល់ថា គឺជាមហាសោកនាដកម្មទី២ បន្ទាប់ពីរបបខ្មែរក្រហមប្រល័យពូជសាសន៍។

លុះមកដល់ថ្ងៃទី២៩ ខែវិច្ឆិកា លោក ហ៊ុនសែន បានថ្លែងបញ្ជាក់យ៉ាងច្បាស់ថា ឧបទ្ទវហេតុដ៏ធំឡែកនេះ គឺកើតឡើងក្នុងការទទួលខុសត្រូវជាក្របខ័ណ្ឌរួមជាក្របខ័ណ្ឌម៉ាក្រូ ដោយមានការទទួលខុសត្រូវរួមទាំងអស់គ្នា សូម្បីតែជនរងគ្រោះរត់ជាន់គ្នាស្លាប់នោះក៏ត្រូវតែមានកំហុសដូចគ្នាដែរ ដូច្នេះ ពុំត្រូវមានការដាក់កំហុសទៅលើមន្ត្រីពាក់ព័ន្ធណាមួយបានទេ ហើយការដកតំណែងពីមន្ត្រីណាមួយក៏ពុំមានដែរ។

ចំណែកការផ្តល់ជំនួយជួយសង្គ្រោះជាទឹកប្រាក់ទៅដល់គ្រួសារអ្នកស្លាប់ក្នុងម្នាក់ចំនួន ១ម៉ឺន២ពាន់ដុល្លារថែមទៀតផង។

**ទស្សនៈមតិ** : មានបណ្តាជនជាច្រើន ក្រោយពីបានស្តាប់សេចក្តីថ្លែងរបស់លោក ហ៊ុនសែន នាយករដ្ឋមន្ត្រីខ្មែរមក បានបញ្ជាក់ឱ្យឃើញពីចេតនា និងឆន្ទៈរបស់លោក ហ៊ុនសែន ដែលបានចាត់ទុកខ្លួនលោកថា ជានាយករដ្ឋមន្ត្រីប្រកបដោយភាពឈ្លៀវឆ្លាត វៀងវៃ និងមានគតិបណ្ឌិត គតិយុត្តិធម៌ ប៉ុន្តែទង្វើ និងការប្រព្រឹត្ត ព្រមទាំងពាក្យសំដីដែលបានចេញមក គឺវាផ្ទុយគ្នាស្រឡះពីនាយករដ្ឋមន្ត្រីនៃអារ្យប្រទេសនានា ។ តួយ៉ាងដូចជា នាយករដ្ឋមន្ត្រីកូរ៉េខាងត្បូង និងរដ្ឋមន្ត្រីក្រសួងគមនាគមន៍បានសម្រេចចិត្តលាលែងពីតំណែងភ្លាម នៅពេលមានស្ពានមួយបានបាក់ បណ្តាលឱ្យរថយន្តដឹកសិស្សសាលាធ្លាក់ស្លាប់មួយចំនួន។

២- លោកនាយករដ្ឋមន្ត្រីជប៉ុន បានលាលែងពីតំណែងភ្លាម នៅពេលបានដឹងថា រដ្ឋមន្ត្រីក្រសួងកសិកម្មបានធ្វើអត្តឃាដដោយចងកសម្លាប់។

៣-លោកនាយករដ្ឋមន្ត្រីថៃ ឧត្តមសេនីយ៍ សុចិន្តាក្រាប្រយូន បានលាលែងពីតំណែងភ្លាម ហើយបានប្រកាសប្រគល់ខ្លួនទៅឱ្យតុលាការកាត់ទោសទៅតាមផ្លូវច្បាប់ ដោយសារតែពលទាហានបានបាញ់រះទៅលើមហាជនជាបាតុករ បណ្តាលឱ្យស្លាប់ប្រមាណជាងពីររយនាក់។

នេះគ្រាន់តែជាតួយ៉ាងខ្លះ សម្រាប់បញ្ជាក់បង្ហាញពីឆន្ទៈអង់អាចក្លាហាន គតិបណ្ឌិត និងគតិយុត្តិធម៌របស់មេដឹកនាំដែលគេមានឧត្តមគតិ មនសិការស្នេហាជាតិពិតប្រាកដ ហើយស៊ូលះបង់ ហ៊ានសារភាពទទួលកំហុសចំពោះមុខប្រជាជន និងប្រទេសដើម្បីទុកជាគំរូ និងជាវប្បធម៌ឱ្យមេដឹកនាំក្រោយៗ។

ទស្សនៈមតិនៃជនជាតិខ្មែរ ដែលរស់នៅក្រៅប្រទេស បានសំដែងការសោកស្តាយ ចំពោះពាក្យសំដីរបស់លោក ហ៊ុនសែន ក្នុងការថ្លែងថា មិនទទួលខុសត្រូវសូម្បីតែបន្តិចបន្តួចក៏គ្មានផង ហើយត្រឡប់ទៅជាលើកសំនួរសួរបញ្ច្រាស់មកលើសកម្មជនណាដែលបានធ្វើការតស៊ូមតិទាមទារឱ្យលោក ហ៊ុនសែន ត្រូវតែពិនិត្យពិចារណាឱ្យបានល្អិតល្អន់នៅក្នុងករណីឧបទ្ទវហេតុដ៏មហាសោកនាដកម្ម ដែលលោកបានឈរគោរពវិញ្ញាណក្ខ័ន្ធទាំងបង្ហូរទឹកភ្នែកនោះ តើវាមានអត្ថន័យដូចម្តេចខ្លះចំពោះខ្លួនលោក?



ជនជាតិខ្មែររស់នៅក្រៅប្រទេស មានមតិយល់ឃើញគួរតែរៃរកជំនួយជួយដល់ក្រុមគ្រួសារដែលរងគ្រោះ តែនៅមានជំនួយដ៏ប្រពៃមួយទៀតដែរ គឺការបង្កើតគណកម្មាធិការស្វែងរកយុត្តិធម៌ឱ្យដល់ជីវិតជនរងគ្រោះទាំងអស់នៅលើស្ពានកោះពេជ្រនាឱកាស បុណ្យអុំទូក ថ្ងៃទី២២ ខែវិច្ឆិកា ២០១០។

គណកម្មាធិការនេះនឹងរកមេធាវី អ្នកច្បាប់ដើម្បីស្រាវជ្រាវរកការទទួលខុសត្រូវរបស់រដ្ឋាភិបាល ឬពីអង្គការផ្សេងៗដែលប្រព្រឹត្តខុស ឬមិនបានប្រុងប្រយ័ត្នក្នុងក្រមខ័ណ្ឌរៀបចំ មើលសុខទុក្ខ ដែលជាសុវត្ថិភាពក្នុងរយៈពេលរៀបពិធីបុណ្យមួយ ហើយហៅមនុស្សឱ្យមកជួបជុំគ្នា ។

បងប្អូនខ្មែរនៅក្រៅស្រុកមានចិត្តសទ្ធាមុះមុតយូរអង្វែងហើយ តែយើងសង្កេតឃើញថា ជំនួយជាថវិកាដែលខ្វះគោលការណ៍ជាក់ស្តែង បានត្រូវអ្នកយកបំរើកំប្លែងលេងសើចមិនដូចបំណងម្ចាស់ជំនួយឡើយ។ លើកនេះទៀត ការមិនពេញចិត្តចំពោះការមិនទទួលខុសត្រូវ ក៏មិនទាន់មាននរណាថែងជាគោលការណ៍ជំនួយក្រៅតែពីឱ្យអំណោយមនុស្សធម៌តែប៉ុណ្ណោះ។ សំណើរបស់ខ្ញុំទៅមតិសាធារណថា ការបាត់បង់ជីវិតរបៀបនេះ ត្រូវតែមានការទទួលខុសត្រូវ។

ដូច្នេះ ខ្ញុំសូមអំពាវនាវសារជាថ្មី ដល់សមានចិត្តជនជាតិរួមឈាមខ្មែរ រស់នៅក្រៅប្រទេសទាំងអស់សូមអញ្ជើញចូលរួមក្នុងគ្រប់មធ្យោបាយ ទាំងកម្លាំងកាយ ចិត្ត ប្រាជ្ញា នឹងថវិកាក្នុងការជួយផ្តល់មេធាវីអ្នកច្បាប់ការពារក្តីដល់ជនរងគ្រោះ ដែលតុលាការនឹងបើកសវនាការរកយុត្តិធម៌ ក្នុងករណីជនរងគ្រោះដោយឧបទ្ទវហេតុលើស្ពានកោះពេជ្រនេះ៕




ដោយ : គឹម ភឿន **(តពីលេខមុន)**

•••យើងបានដឹងទាំងអស់គ្នាថា ប្រទេសជឿនលឿនទាំងអស់លើពិភពលោកនេះគេតែងតែដឹងគុណគ្រូបង្រៀន គេគោរពគ្រូបង្រៀនទាំងអស់គ្នា ព្រោះគ្រូបង្រៀននេះហើយជាអ្នកបើកភ្នែកឱ្យកូនចៅគេទាំងអស់គ្នាបានភ្លឺ ស្គាល់ខុសស្គាល់ត្រូវ មានបញ្ញាវាងវៃ មានតម្រិះចេះដឹងនឹងមានអនាគតល្អ។ ពិសេសគ្រូធ្វើឱ្យក្មេងក្លាយជាប្រជាពលរដ្ឋល្អ ស្គាល់សិទ្ធិនិងករណីយកិច្ចជាប្រជាពលរដ្ឋរបស់ខ្លួន។ ហេតុអ្វីបែរជាអង្គការលើខ្មែរក្រហមសម្លាប់គ្រូបង្រៀនទៅវិញ? ត្រង់នេះបញ្ជាក់ឱ្យយើងឃើញច្បាស់ថា ខ្មែរក្រហមចង់គ្រប់គ្រងឱ្យប្រជាពលរដ្ឋក្លាយជាមនុស្សល្ងង់ខ្លៅស្រួលឱ្យពួកវាជិះជាន់សង្កត់សង្កិនឱ្យក្លាយជាខ្ញុំកញ្ជះវាដោយគ្មានថ្ងៃរើបម្រាស់រួច។ នៅក្នុងអនាគតដ៏ខ្លីនេះ ប្រទេសមួយដែលមានសុទ្ធតែមនុស្សអវិជ្ជាដូចគំរោងការរបស់ពួកវា តើកម្ពុជាដ៏កំសត់របស់យើងនឹងក្លាយជាអ្វីទៅ? ប្រទេសយើងនឹងក្លាយជាប្រទេសខ្ញុំគេមិនខាន។ គំរោងការរបស់ខ្មែរក្រហម គឺជាគំរោងការរបស់បរទេសសុទ្ធសាធដែលពួកវាកំពុងពឹងពាក់គេឱ្យមកជួយដណ្តើមយកជ័យជំនះ ទោះជាប្រទេសខ្លួនក្លាយជាខ្ញុំកញ្ជះគេក៏ពួកវាគ្មានរវល់។ នៅក្នុងតំបន់រំដោះរបស់ពួកវាប្រជាពលរដ្ឋកំពុងបានពួកវាប្រែក្លាយឱ្យទៅជាជនក្រីក្រតោកយ៉ាក អត់បាយក្រហាយទឹក ឈឺថ្កាត់បាក់កម្លាំង ហើយស្តាប់តែតាមការបញ្ជាចុងកាំភ្លើង ឬខ្នងពូថៅ ប្រគាក់របស់ពួកវា ដោយគ្មានកម្លាំងរើបំរាស់ ឬតបតបានឡើយ។ ប្រជាពលរដ្ឋយើងត្រូវចាប់បង្ខំឱ្យទៅគាស់ថ្នល់ បំផ្លាញស្ពាន គាស់ផ្លូវដែករ៉ឺនៃរទេះភ្លើងក្រោមបញ្ជានៃពួកកូនទាហានយួនវៀតកុងក្មេងៗ ឯអ្នកមុខអ្នកការខ្មែរក្រហមមិនឃើញមានចេញមុខមកសោះ។ ពួកវាបានប្រគល់ដាច់តំបន់រំដោះឱ្យទៅយួនហើយទេដឹង? ពេលរទេះភ្លើងរលំក្រឡាប់ទាំងខ្សែម្តងៗ សម្លេងហ៊ោកញ្ជ្រៀវសប្បាយរបស់ប្រជាជនយើងផ្ទុះឡើងហាក់ដូចសប្បាយខ្លាំងណាស់ ហើយរត់ស្រទៅប្លន់ទ្រព្យសម្បត្តិ និងទំនិញរបស់អ្នកដំណើរជាខ្មែរគ្នាឯង ក្រោមបញ្ជារបស់អាកូនទាហានយួនវៀតកុងប៉ុន្មានក្បាលដែលវាថានឹងខំការពារឱ្យដឹកជញ្ជូនរបស់ទ្រព្យទាំងនោះទុកជាទ្រព្យសម្បត្តិផ្ទាល់ខ្លួនរបស់បងប្អូនចុះ។ អំពើដ៏ព្រៃផ្សៃយ៉ាងនេះបានបងប្អូនខ្មែរល្ងិតល្ងង់ទាំងនោះយល់ថា ជាគុណសម្បត្តិរបស់សម្ព័ន្ធមិត្តរបស់ខ្មែរក្រហមទៅវិញ ហើយខំអរគុណគេយ៉ាងខ្លាំងទៅទៀតផង។ ខ្ញុំក៏សុំបញ្ជាក់ថា ក្នុងចំណោមបងប្អូនទាំងនោះនៅមានមួយចំនួនតូចឈរមើលដោយសម្រក់ទឹកភ្នែក ហើយរអ៊ូថា "អាណិតណាស់មិនដឹងបងប្អូនគេបងប្អូនឯងទេ សុទ្ធតែខ្មែរដូចគ្នា"។ ពួកវាកំពុងបំបែកបំបាក់បងប្អូនសាច់ឈាមយើងឱ្យទៅជាសត្រូវ វណ្ណៈស្អប់ខ្ពើមគ្នាឯង ហើយទៅស្រឡាញ់សាសន៍ដ៏ទៃថាជាអ្នកមានគុណ។ ហេតុការណ៍នេះធ្វើឱ្យអ្នកក្រចងពារ គំនុំសងសឹកប្រឆាំងនឹងអ្នកមានទ្រព្យ អ្នកល្ងិតល្ងង់អវិជ្ជាក្លាយជាសត្រូវស្លាប់រស់នឹងអ្នកមានតម្រិះចេះដឹង។ សង្គមខ្មែរយើងក្លាយជាវឹកវរគ្មានច្បាប់គ្មានរបៀប តើសង្គមខ្មែរនឹងក្លាយទៅជាអ្វីទៅថ្ងៃអនាគតដ៏ខ្លីខាងមុខនេះ? ខ្មែរក្រហមស្រឡាញ់អំណាចជ្រុលហួសហេតុពេកបានភ្លេចខ្លួន មិនដឹងទាល់តែសោះថា ខ្លួនបានចងកសម្លាប់ខ្លួនឯងហើយ។ យើងឃើញក្រឡាយ៉ាងច្បាស់ថា ចុងក្រោយបង្អស់ពួកខ្មែរក្រហមបានសម្ព័ន្ធមិត្តជួយឱ្យទៅកាន់ជ័យជំនះ។ ខ្មែរក្រហមគ្មានទ័ពខ្លួនឯង គ្មានជាតិឯងជាអ្នកដឹកនាំ មានតែជាតិសាសន៍ដ៏ទៃដឹកនាំ គេមុខតែដឹកនាំឱ្យយើងក្លាយជាខ្ញុំកញ្ជះគេ ទីបំផុតខ្មែរក្រហមក្លាយជាអ្នកស៊ីឈ្នួលសម្លាប់ប្រជាជនខ្លួនឯងដើម្បីផ្គាប់ចិត្តចៅហ្វាយនាយអស័យសាស៍នឹងបានឡើងបុណ្យសក្តិធំជិះជាន់សម្លាប់បំផុតជាតិឯងតែម្តង។ ខ្មែរក្រហមខ្លួនឯងក៏គង់តែត្រូវសម្ព័ន្ធមិត្តសម្លាប់អស់គ្មានសល់ដែរ ព្រោះគេគ្រាន់តែខ្ចីដៃពួកវាប្រើជាដំបូងឱ្យសម្លាប់រង្គាលជាតិឯងតែប៉ុណ្ណោះ ដល់ពេលអស់ជនជាតិម្ចាស់ស្រុកហើយពេលនោះសត្រូវទើបឱ្យមេរៀនពួកវាឃើញថា លទ្ធផលរបស់អ្នកក្បត់ជាតិឯងនឹងសោយនូវភាពអាមាស់ថោកទាបយ៉ាងណា។

ឯកឧត្តម ឧត្តមសេនីយ៍ លោកជំទាវជាទីគោរពទាំងអស់! អ្នកដែលស្លាប់មុនខ្មែរក្រហមពេលសត្រូវចូលមកប្លន់ទឹកដី និងអំណាចពីសាធារណរដ្ឋខ្មែរបាននោះ គឺយើងទាំងអស់គ្នានេះឯង សូមកុំភ្លេចរឿងនេះ ពួកវាបានបង្រៀនឱ្យអ្នកក្រីក្រស្រទាប់អធនចងគំនុំនឹងយើងចាំតែថ្ងៃសងសឹកនឹងយើង យើងមិនអាចឈរជាអព្យាក្រឹត្យ ឬចាក់ខ្សែបានជាដាច់ខាត។ យើងត្រូវតែឈ្នះលើសត្រូវឈ្លានពាន បើមិនឈ្នះទេយើងនឹងត្រូវស្លាប់ទាំងអស់គ្នា ទីបំផុតជាតិយើងនឹងត្រូវរលាយសាបសូន្យមិនខាន។ សូមមេត្តាកុំចាក់ខ្សែ កុំឈរអព្យាក្រឹត្យឱ្យសោះនៅក្នុងសង្គ្រាមនេះ។ បន្ទាប់ពីនេះខ្ញុំសូមអនុញ្ញាតបានថ្លែងវិយោគកថាទៅកាន់សពជាសង្សា ជាគូដណ្តឹង និងជាប្រពន្ធដែលគ្មានពេលនឹងបានរៀបការនេះផងចុះ :

អូនបុប្ផាជាទីស្រឡាញ់ស្មើជីវិតបង! យើងបានសាងក្តីសង្ឃឹមជាមួយគ្នាថា នៅថ្ងៃសន្តិភាពរបស់មាតុភូមិ យើងនឹងបានរស់ជាមួយគ្នាយ៉ាងសុខសាន្ត ឥឡូវអូនត្រូវបង្ខំឱ្យលាចាកចេញទៅដោយគ្មានលាបងមួយម៉ាត់ ហើយបានបន្សល់ទុកឱ្យបងនូវសៀវភៅប្រចាំជីវិតរបស់អូនដែលលោកយាយបានរក្សាទុកឱ្យបង បងនឹងខំរក្សាទុកក្បែរខ្លួនបងជានិច្ច ដើម្បីបានអានហើយអានទៀតនូវមនោសញ្ចេតនារបស់ប្អូនស្រីតូចមួយ និងជាសង្សាដ៏ឧត្តមដែលបងមានវាសនាបានជួបនៅក្នុងជីវិត។

បងនឹងសាងផ្នូរមួយសម្រាប់អូនក្នុងបេះដូងបង ក្តីស្នេហ៍របស់បងសម្រាប់អូនជាក្តីស្នេហ៍គ្មានទីបញ្ចប់។ សូមអូនស្ថិតនៅយ៉ាងសុខសាន្តក្នុងអណាចក្រកសាងឡើងក្នុងបេះដូងបងនេះជារៀងរហូតចុះ។ ផ្លូវទៅមុខរបស់បងមានតែមួយ គឺតស៊ូប្រយុទ្ធរហូតគ្មានរាថយដើម្បីមាតុភូមិបានសុខសាន្តប្រជាពលរដ្ឋបានសន្តិភាពឡើងវិញសាជាថ្មី។ បន្តិចទៀតនេះឧទ្ធម្ភាគចក្រនឹងនាំបងត្រឡប់ទៅសមរភូមិតាំងគោកវិញ សូមព្រលឹងអូនតាមបង ហើយសោយរាជ្យក្នុងបេះដូងបងជារហូតទៅ!។

លោកឪពុក អ្នកម្តាយព្រមទាំងសាច់សារលោហិតទាំងអស់ លោកជំទាវ ឯកឧត្តម លោកឧត្តមសេនីយ៍ជាទីគោរពទាំងឡាយ! ខ្ញុំសូមលើកដៃបួងសួងសូមឱ្យអស់លោកបានសុខសប្បាយគ្រប់ៗគ្នាហើយខំពូតដៃរក្សាការពារដីកេរ្តិ៍ដូនតារបស់យើងទាំងអស់គ្នាកុំឱ្យបាត់បង់ ព្រោះនេះជាចំណិតចុងក្រោយដែលបាននៅសល់សម្រាប់កូនចៅយើងរស់នៅកុំឱ្យគ្នារត់ទៅនៅក្រោមសំយាបផ្ទះគេដូចជនជាតិដទៃដែលបាត់បង់ទឹកដី។ **(ចប់ភាគមួយដោយបរិបូរ សូមរង់ចាំអានភាគទី២ជាបន្ត)**

# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរពីប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក



(តពីលេខមុន)

ដោយ : ពិន នារីពិទូ

...សៀងហៃ Shanghai ជាទីក្រុងដែលមានប្រជាប្រិយភាពជាងគេនៅប្រទេសចិន និងរីកចំរើនលើគ្រប់វិស័យ។ នៅក្នុងទីក្រុងនេះ ពួកយើងមានការលំបាកក្នុងការស្វែងរកកន្លែងប្រើប្រាស់អ៊ិនធើណេតសំរាប់ទំនាក់ទំនងផ្ញើសារ។ ដើម្បីទៅទស្សនាខេត្ត Pudong ពួកយើងបានចំណាយពេលអស់២០នាទីក្នុងការស្វែងរកទីតាំងនៃកំពង់ចម្លងតាមការចង្អុលបង្ហាញរបស់អ្នកស្រុកនៅទីនោះ ពេលខ្លះអាចធ្វើឱ្យពួកយើងវង្វេងផ្លូវដោយសារការប្រាប់ខុសទិស។ អាគារ jinmao មានកំពស់ខ្ពស់ជាងគេ និងមានចំនួន៨៨ជាន់ឈរខ្ពស់ត្រដែតផុតពពក ទស្សនាវត្តអារ៉ាម និងរូបចំលាក់បដិមាករព្រះពុទ្ធជាច្រើនពាន់អង្គ ដែលជាទីសក្ការៈនៃអ្នកប្រតិបត្តិព្រះពុទ្ធសាសនា និងទស្សនាការសម្តែងសៀករហ័សកម្ម តាមបែបប្រពៃណីចិន។ បន្ទាប់ពីបានស្នាក់នៅទីនេះអស់រយៈពេលបីថ្ងៃ ពួកយើងសំរេចចិត្តថានឹងធ្វើដំណើរទៅ Hangzhou បន្តនៅព្រឹកស្អែកដោយបើកបរអស់រយៈពេលពីរម៉ោងទើបទៅដល់ Hangzhou ពាក្យបុរាណចិននិយមហៅថាជាស្រុក "ឋានសួគ៌"។ ពួកយើងមានគំរោងស្នាក់នៅទីនេះចំនួនពីរយប់ដើម្បីយល់ដឹងនូវអរិយធម៌នៃតំបន់ប្រវត្តិសាស្ត្រដ៏ល្បីល្បាញមួយនេះ នេះជាឱកាសល្អក្នុងការដើរលំហែរនៅបឹងយក្សដែលស្ថិតនៅភាគខាងលិច Hangzhou ។ ទោះជាផ្ទៃមេឃមិនសូវស្រឡះល្អ ប៉ុន្តែប្រជាជនធ្វើចរាចរណ៍ជាធម្មតា ពួកយើងបន្តជិះទូកចម្លងទៅដល់កោះពីរដែលនៅកណ្តាលទន្លេ គឺកោះ Pavilion និង Xiaoying Island នៅទីនេះមានវត្តអារ៉ាមដ៏ល្បីមួយឈ្មោះថា Pagoda of six harmonies ដែលមានរឿងនិទានដំណាលថា កាលពីព្រេងនាយមានស្តេចនាគមួយអង្គដែលរស់នៅក្នុងទន្លេ Qiantang ដែលជារឿយៗតែងតែបង្ការព្យុះភ្លៀង និងរលកធំៗដើម្បីចាប់អ្នកនេសាទនៅលើផ្ទៃទឹកទន្លេ និងបង្ការជាទឹកជំនន់លិចលង់ដំណាំអ្នកស្រែចំការ។ បុរសឈ្មោះ Liuhe (six harmonies) ដែលជាជនរងគ្រោះ និងជាឪពុករបស់កុមារម្នាក់ ដែលមានម្តាយបានបាត់ខ្លួនក្នុងហេតុការណ៍នោះ ដោយសេចក្តីខឹងក្រោវក្រោធយ៉ាងខ្លាំងចំពោះស្តេចនាគ លោក Liuhe បានគប់ដុំថ្មចូលទៅក្នុងទន្លេរាល់ថ្ងៃ រហូតទាល់តែស្តេចនាគយល់ព្រមប្រគល់ប្រពន្ធ និងកូនប្រុសមកឱ្យខ្លួនវិញ និងឈប់ធ្វើបាបប្រជាជនតទៅទៀត ប្រជាជនក៏បានសាងសង់វត្តអារ៉ាមនេះឡើង ហើយដាក់ឈ្មោះថាវត្ត Liuhe (six harmonies) ដើម្បីរំលឹកទៅដល់ឈ្មោះលោក Liuhe តែម្តង វត្តអារ៉ាមនេះមានកំពស់៧ជាន់មើលពីខាងក្រៅ ចំណែកខាងក្នុងមានកំពស់១៣ជាន់ដែលខុសពីវត្តអារ៉ាមនៅស្រុកខ្មែរយើង។ ទស្សនាភ្នំ Feilaifeng បន្ត ដែលជាទីសក្ការៈបូជា និងជារមណីយដ្ឋានសំរាប់ជនជាតិចិន និងអ្នកទេសចរណ៍មកកំសាន្តសប្បាយដោយនាំគ្នាថតរូបទុកជាអនុស្សាវរីយ៍ជាមួយនឹងរូបភាពអ្នកតាចិនជាងបីរយអង្គឆ្លាក់នៅតាមជញ្ជាំងថ្ម។ ពួកយើងមានការលំបាកក្នុងការស្វែងរកឱសថស្ថានក្នុងតំបន់នេះ នៅទីនេះមានតែឱសថបុរាណដែលធ្វើពីរុក្ខជាតិ និងសត្វដាក់លក់បន្តិចបន្តួច។

ថ្ងៃទី២២ ខែតុលា ឆ្នាំ២០០៦ សរុបចំងាយផ្លូវដែលបានធ្វើដំណើរតាមរថយន្តតូយូតាផ្ទាល់ខ្លួនពីប្រទេសបារាំងមកដល់ Xiamen មានចំងាយផ្លូវសរុបចំនួន ១៥.០០០គីឡូម៉ែត្រមកហើយ។ នាពេលព្រឹកពួកយើងបានចាកចេញពី Hangzhou ឆ្ពោះទៅកាន់តំបន់ឆ្នេរដែលនៅភាគខាងត្បូងឈាងខាងកើតប្រទេសចិនគឺ Xiamen មានព្រំប្រទល់ខាងជើងជាប់នឹង Quanzhou ខាងត្បូងជាប់នឹង Zhangzhou ក្រៅពីតំបន់ឆ្នេរទីនេះសំបូរទៅដោយភ្នំ និងចំការបន្លែនៅតាមចង្កេះភ្នំ ដែលឆ្លុះបញ្ចាំងពីជីវភាពកសិករ និងការប្រកបរបរដាំដុះរបស់ពួកគេ។ ពួកយើងបានមកដល់ខេត្តនេះនាពេលរសៀល នៅពីមុខពួកយើង គឺជារមណីយដ្ឋានឆ្នេរកោះ Gu Lang Yu ជាកោះដ៏ពេញនិយមក្នុងការមកកំសាន្ត



របស់ជនជាតិចិន។ រមណីយដ្ឋាននេះមានឆ្នេរខ្សាច់ពណ៌មាស និងមានការជិះទូកស្ទូចត្រីលេង មានកាណូតសំរាប់កំសាន្ត បន្ធូរអារម្មណ៍ស្រូបយកក្លិនផ្កា ស្តាប់តន្ត្រី។ល។ តំបន់នេះគឺជាកោះដែលមានធាតុអាកាសបរិសុទ្ធគ្មានផ្សែង ពួកយើងបានចំណាយពេលមួយល្ងាចដើម្បីដើរលំហែរកាយលើទឹកដីឆ្នេរកោះនេះ។





## តមកទំព័រទី ០១ សោកនាដកម្មនៅលើស្ពានពេជ្រ...

បានកើនឡើងបួននាក់បន្ថែមដោយពីរនាក់ជាអ្នករបួសធ្ងន់ហើយបានស្លាប់ ចំណែកឯសាកសពពីរនាក់ទៀតក្រុមគ្រួសារជនរងគ្រោះទើបចាប់ផ្តើមរាយការណ៍ទៅអជ្ញាធរដែនដី ។

សូមរំលឹកឡើងវិញថាឧបទ្ទវហេតុនេះបានកើតឡើងនៅយប់ម៉ោង៩នាថ្ងៃទី២២ ខែវិច្ឆិកា ឆ្នាំ២០១០ ដែលជាថ្ងៃបង្ហើយនៃព្រះរាជពិធីបុណ្យអុំទូកមានប្រជាពលរដ្ឋជាងមួយពាន់នាក់បានឈរកកកុញចាក់ស្រេះគ្នានៅចំកណ្តាលស្ពានពេជ្រ ដែលទើបនឹងសម្ពោធឱ្យប្រើនាឱកាសបុណ្យអុំទូកនេះ ។ នារាត្រីដែលមានមនុស្សពេញណែនលើស្ពានថ្មីក្នុងដង់ស៊ីតេ១០នាក់ក្នុងមួយម៉ែត្រក្រឡាមាននាក់ខ្លះខ្សោយកំលាំងជាងគេត្រូវបានដួលសន្លប់ជាបន្តបន្ទាប់ដោយសារកង្វះអុកស៊ីហ្សែនក្នុងខ្លួនយ៉ាងធ្ងន់ធ្ងរ ហើយត្រូវបានគេជាន់ពីលើពីរទៅបីនាក់ថែមទៀត ក៏ត្រូវស្លាប់ជាបន្ទាន់ រីឯអ្នកខ្លះបានត្រដរងើបករ និងលើកដៃឡើងលើដើម្បីស្រូបយកអុកស៊ីហ្សែន អ្នកខ្លះបានឡើងដើរជាន់ពីលើមនុស្សដើម្បីរំដោះខ្លួនដោយបានលោតចូលទៅក្នុងទឹកស្ទឹងដែលនៅពីក្រោមស្ពាន ដែលការលោតនេះមានរស់ និងមានស្លាប់នៅក្នុងទឹកផងដែរ ខណៈនោះមានយុវជនខ្លះបានខំប្រឹងទាញដៃគ្នារើបំរះឱ្យបានផុតឡើងទៅលើ ប៉ុន្តែនៅតែមិនអាចរំដោះខ្លួនបានដោយសារមនុស្សជាប់គ្នាដូចជ័រការ ខណៈនោះសំលេងស្រែកទ្រហោយំ សំលេងស្រែកឱ្យជួយលាន់ឡើងយ៉ាងទ្រហឹងគួរឱ្យវេទនាក្រៃលែងដោយរកអ្វីមកអត្ថាធិប្បាយមិនបាន ។ មនុស្សដែលមានកំលាំងខ្សោយត្រូវបានដួលសន្លប់រណ្តូករណែលមុនគេ មានសាកសពរាប់រយនាក់ដេកគរជើងគ្នានៅលើស្ពានពេជ្រ មានអ្នករងរបួសជាំពេញខ្លួនដោយសារការកកិតគ្នា និងផ្តោបគ្នាខ្លាំងពេក អ្នកខ្លះបាក់ឆ្អឹងជំនី បាក់ដៃ និងខូចអវៈយវៈគ្រឿងក្នុង ដូចជាតំរងនោមជាដើម ។ល។ ក្រោយពីជាប់គាំងនៅលើស្ពានរយៈពេលយ៉ាងយូរទើបឃើញកំលាំងសមត្ថកិច្ចប៉ូលិសចុះធ្វើអន្តរាគមន៍ និងបានរំដោះអ្នករងគ្រោះដាក់លើឡានពេទ្យដែលមានចំនួន៥០គ្រឿង ក្នុងឡាននីមួយៗមានបំពង់ខ្យល់តែមួយសំរាប់ជនរងគ្រោះពី៥ទៅ៦នាក់ ហើយបានដឹកទៅកាន់មន្ទីរពេទ្យចំនួនបួនគឺ មន្ទីរពេទ្យព្រះកេតុមាលា មន្ទីរពេទ្យព្រះកុសុមៈ មន្ទីរពេទ្យកាល់ម៉ែត្រ និងមន្ទីរពេទ្យសូវៀត ។ សាកសពអ្នករងគ្រោះត្រូវបានបញ្ជូនទៅសាលតំកល់សពដោយរដ្ឋាភិបាលបានឧបត្ថម្ភក្រណាត់សរុំសព និងក្តាមឈ្ញូស មានរថយន្តជូនសព និងក្រុមគ្រួសារទៅដល់លំនៅដ្ឋានដើម្បីធ្វើបុណ្យនៅតាមគេហដ្ឋានរៀងៗខ្លួន ។ អ្នករងរបួសត្រូវបានទទួលការព្យាបាលយ៉ាងយកចិត្តទុកដាក់ពីសំណាក់ក្រុមគ្រូពេទ្យ ព្រមទាំងមានការឧបត្ថម្ភពីសប្បុរសជនជាច្រើននាក់ ទាំងផ្នែកសំភារៈ និងថវិកា រីឯអាហារត្រូវបានឧបត្ថម្ភដោយភោជនីយដ្ឋានសេអ៊ូល ។

តាមសំដីរបស់លោក រិទ្ធិ ដែលជាជនរងគ្រោះបាននិយាយក្រោយព្រឹត្តិការណ៍ថា រូបលោកបានត្រូវរបួសបាក់ឆ្អឹងដៃនាថ្ងៃនោះ រូបលោកក៏ដូចជាជនរងគ្រោះផ្សេងទៀតដែរ បានដើរលេងនៅកោះពេជ្រដោយឆ្លងកាត់ស្ពានពេជ្រ ពីដំបូងនៅគល់ស្ពានមិនសូវមានមនុស្សច្រើនពេកទេ លុះដល់ពាក់កណ្តាលស្ពានទើបមានមនុស្សណែនណាន់តាន់តាប់ ។ មុនព្រឹត្តិការណ៍បានកើតឡើងរូបលោកបានដើរនៅលើគល់ស្ពានក្បែរក្មេងស្ទាវមួយក្រុមដែលធុំក្លិនស៊ារ៉ាភាយៗ រំពេចនោះក្រុមក្មេងស្ទាវក៏បានដើរទៅប៉ះនឹងលោកពូម្នាក់ដែលដើរជាមួយនឹងកូនស្រីគាត់ លោកពូនោះបាននិយាយទៅកាន់ក្មេងស្ទាវថា ដើរឱ្យស្រួលកុំឱ្យប៉ះគាត់ ក្មេងឮសំដីដូចនេះក៏បានតបតវិញ រួចវាយលោកពូនោះមួយដៃដួលទៅលើដី ស្របពេលនឹងមនុស្សផ្អើលកកកុញនៅទីនេះក៏លេចឮសំលេងស្រែកចេញពីហ្វូងមនុស្សថា "ស្ពានបាក់ឥឡូវហើយ" ពេលនោះធ្វើឱ្យមនុស្សភ័យស្លន់ស្លោ នាំគ្នារត់ជំពាក់ជើងគ្នាដួលជាន់ពីលើគ្នា ក្នុងពេលនោះរូបលោកក៏ដូចជាមនុស្សម្នានៅលើស្ពានជាច្រើនពាន់នាក់នោះមិនអាចរំកិលខ្លួនទៅណាបានឡើយគឺ មានតែប្រឹងដកដង្ហើមជាមួយនឹងរបួសជាំពេញខ្លួន ។ ដោយសារមនុស្សស្ថិតជាប់គ្នានៅពេលនោះទិដ្ឋភាពដែលលោកបានឃើញ

រូបថតដោយ ឆាលីយ៉ុង

គឺភាពខ្លោចផ្សានៃជនរងគ្រោះដែលបានបែកពពុះមាត់ និងមានឈាមចេញតាមច្រមុះមាត់ ហើយខំស្រែកឱ្យគេជួយរកសាច់ញាតិខ្លួនយ៉ាងខ្លោចផ្សា និងវេទនាក្រៃលែង រូបភាពព្រមទាំងសម្លេងថ្ងូរនេះមិនទាន់មានប្រព័ន្ធផ្សព្វផ្សាយណាថតបាននោះទេ ក្នុងខណៈពេលស្លន់ស្លោនោះហើយរូបភាពនេះបានអន្ទងនៅនឹងមុខលោកគ្រប់ពេលវេលា ។ មានជនរងគ្រោះខ្លះបានបន្ទោសទៅលើអ្នកការពារសន្តិសុខនៅស្ពានពេជ្រ ដោយមិនបានរាយការណ៍ទាន់ពេលវេលាធ្វើឱ្យមនុស្សរាប់ពាន់នាក់ជាប់គាំងនៅលើស្ពានអស់រយៈពេលយ៉ាងយូរទើបប្តឹងទៅសមត្ថកិច្ចឱ្យធ្វើអន្តរាគមន៍ជួយសង្គ្រោះ ។ រីឯក្មេងម្នាក់ទៀត ដែលត្រូវរបួសបន្ទាប់ពីកើតហេតុបាននិយាយថាបន្ទាប់ពីមានការភ្ញាក់ផ្អើលពួកគេដែលមានគ្នាចំនួន៦នាក់បាននាំគ្នាសំរុករត់ចេញពីស្ពានត្រឡប់ក្រោយវិញ ប៉ុន្តែត្រូវអ្នកយាមស្ពានពេជ្រ មិនឱ្យត្រឡប់ក្រោយ គឺឱ្យរត់ទៅមុខអ្នកយាមស្ពាននោះបានយករបាំងបិទច្រកមិនឱ្យចេញ ទើបពេលនោះជនរងគ្រោះបានដួលរួចត្រូវគេជាន់ស្លាប់ទាំងអស់ ។ ចំណែកឯជនរងគ្រោះខ្លះបានបន្ទោសទៅលើសមត្ថកិច្ចដែលទទួលខុសត្រូវការពារសុវត្ថិភាពក្នុងព្រះរាជពិធីបុណ្យអុំទូកនេះថា មានការយឺតយ៉ាវក្នុងការមកជួយសង្គ្រោះ ចំណែកឯសម្ភារៈសង្គ្រោះបន្ទាន់ដូចជាបំពង់ខ្យល់អុកស៊ីហ្សែន និងគ្រូពេទ្យបឋមសំរាប់ជួយជនរងគ្រោះដែលត្រូវការជាចាំបាច់មិនមានគ្រប់គ្រាន់សំរាប់សង្គ្រោះបន្ទាន់នៅកន្លែងកើតហេតុ ។

អ្នកស្លាប់ដែលផុតរលត់ទៅបានបន្សល់នូវការឈឺចាប់ឱ្យសាច់ញាតិដែលនៅរស់ជារៀងរាល់ថ្ងៃ ដោយគ្រួសារខ្លះស្លាប់កូនទាំងអស់នៅសល់តែម្តាយចាស់ជរានៅចាំផ្ទះម្នាក់ឯង ខ្លះទៀតស្លាប់ប្រពន្ធ និងកូនអស់រលីងនៅសល់តែប្តី រីឯកុមារខ្លះត្រូវរស់នៅឯកកោរម្នាក់ឯងដោយសារឪពុកម្តាយដែលធ្លាប់តែស្រឡាញ់ថ្នាក់ថ្នមកូនបានស្លាប់ចោលអស់នៅលើស្ពានពេជ្រតែមួយពព្រិចភ្នែក គ្រួសារអ្នកស្លាប់ទាំង៣៥១នាក់នោះ ត្រូវរស់នៅអោបក្រសោប ទុក្ខវេទនានៃការព្រាត់ប្រាស់រៀងរាល់ថ្ងៃ ប៉ុន្តែភាពឯកកោររបស់ពួកគេត្រូវបានលួងលោមដោយសប្បុរសជន និងរាជរដ្ឋាភិបាលដែលបានឧបត្ថម្ភជាអំណោយជាបន្តបន្ទាប់ ។

លោក ទូច ណារ៉ុថ ស្នងការនគរបាលរាជធានីភ្នំពេញបានឆ្លើយតបចំពោះការចោទប្រកាន់ទៅលើភាពយឺតយ៉ាវក្នុងការជួយសង្គ្រោះថា នោះមិនមែនជាការពិតទេ ។ ក្រុមសមត្ថកិច្ចបានទៅដល់កន្លែង៥នាទីក្រោយកើតហេតុ ប៉ុន្តែការសង្គ្រោះមានការលំបាកខ្លាំងណាស់នៅពេលដែលមនុស្សរាប់ពាន់នាក់ដួលលើគ្នាចន្លោះស្ពានតូចចង្អៀតបំផុត និងមិនអាចប្រើកំលាំងជួយសង្គ្រោះច្រើនបានទៀត ដូចនេះការជួយសង្គ្រោះមានរយៈពេលយូរ ប៉ុន្តែកំលាំងសមត្ថកិច្ចបានជួយសង្គ្រោះភ្លាមៗមិនមានការយឺតយ៉ាវដូចការចោទប្រកាន់ឡើយ ។ ចំណែកការចោទប្រកាន់មួយទៀតថា សមត្ថកិច្ចគ្មានជំនាញក្នុងការជួយសង្គ្រោះនោះ លោកថាមិនពិតទេ ពីព្រោះសមត្ថកិច្ចមិនត្រឹមតែមានជំនាញបង្ក្រាប និងរៀបចំសណ្តាប់ធ្នាប់ប៉ុណ្ណោះទេ តែមានសមត្ថភាពក្នុងការជួយសង្គ្រោះផងដែរ ។

ក្រោយពីកើតហេតុភ្លាមៗ លោកនាយករដ្ឋមន្ត្រីហ៊ុនសែន បានថ្លែង អត្ថាធិប្បាយទាំងពាក់កណ្តាលយប់ដោយចាក់ផ្សាយបន្តផ្ទាល់នៅលើបណ្តាញទូរទស្សន៍នូវចំនួនមនុស្សស្លាប់ និងរបួសដែលបានកើនឡើងជាបន្តបន្ទាប់ថា លោកសំដែងនូវការសោកស្តាយព្រមទាំងប្រកាសនូវប្រាក់ឧត្តម្ភដល់គ្រួសារជនរងគ្រោះ និងបានប្រកាសជាផ្លូវការនូវសារាចរណ៍របស់រដ្ឋាភិបាល ដោយកំណត់យកថ្ងៃទី២៥ ខែវិច្ឆិកា រៀងរាល់ឆ្នាំជាថ្ងៃកាន់មរណៈទុក្ខដល់ជនរងគ្រោះនៅលើស្ពានពេជ្រ ដោយឱ្យបង្ហូតទង់ជាតិតែពាក់កណ្តាលដង ឱ្យបញ្ឈប់នូវការចាក់កម្មវិធីកំសាន្តនៅតាមបណ្តាញ ឃោសនាទាំងអស់ និងឱ្យធ្វើស្តូបនៅពីមុខស្ពានពេជ្រ ដើម្បីជាកន្លែងសក្ការៈឧទ្ទិសនូវដួងព្រលឹងអ្នកដែលបានស្លាប់ទៅ លោកបានបញ្ជាក់ទៀតថា បន្ទាប់ពីសម័យខ្មែរក្រហម នេះជាលើកទីពីរហើយនៃព្រឹត្តិការណ៍សោកនាដកម្មដែលមានមនុស្សស្លាប់ និងរងរបួសអស់ជិតមួយពាន់នាក់ក្នុងពេលតែមួយពព្រិចភ្នែក ។ នៅម៉ោង៧ព្រឹកថ្ងៃទី២៥ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងភរិយា រួមទាំងមន្ត្រីព្រឹទ្ធសភា រដ្ឋសភា មន្ត្រីសាលាក្រុង មន្ត្រីរាជការ សិស្សានុសិស្ស និងប្រជាពលរដ្ឋបានប្រារព្ធនូវពិធីកាន់មរណៈទុក្ខដល់សាកសពជនរងគ្រោះ (តទៅទំព័រទី ១៦)

# ខ្មែរគ្រប់បក្សគ្រប់សមាគមគ្រប់វត្តនៅសហគមន៍ហ្វីឡាគ្រោងធ្វើបុណ្យរួមគ្នា

**ដោយ : អ៊ុម លឿម**



អាចនិយាយបានថា ជាឱកាសដ៏កម្រមួយ ដែលក្រុមអ្នកប្រឡូកក្នុងកិច្ចការសង្គមរបស់សហគមន៍របស់ខ្មែរហ្វីឡាដែលហ្វៀ ជាច្រើនក្រុមនិងច្រើនបក្សបានចំណាយពេលវេលាចុងសប្តាហ៍របស់មកអង្គុយទល់មុខគ្នា ដើម្បីពិភាក្សាអំពីធ្វើយ៉ាងណា ដើម្បីផ្តល់ផលប្រយោជន៍ដល់សហគមន៍ខ្មែរ និងប្រទេសកម្ពុជា ក្នុងខណៈដែលប្រទេសជាតិកំពុងជួបនូវមហាសោនាដកម្មនាថ្ងៃទី២២ខែវិច្ឆិកា ឆ្នាំ២០១០កន្លងទៅនេះ ។

នេះជាវេទិការជជែកវែកញែក ដែលពុំមានរបៀបវារៈច្បាស់លាស់ និងពុំមានអ្នកទទួលខុសត្រូវក្នុងការរៀបចំកម្មវិធី ប៉ុន្តែបន្ទាប់ពីការជជែកគ្នាជិតមួយម៉ោង ក្រោយមកទើបក្រុមអ្នកចូលរួមទាំងអស់បានអនុម័ត ដោយលើកដៃក្នុងការប្រគល់ភារកិច្ចទាំងនោះដល់លោក សិរិត សម ប្រធានសមាគមខ្មែរតជាអ្នកសម្របសម្រួលកម្មវិធី ។

ទោះបីអ្នកកាន់កម្មវិធីបានប្រសូត្រចេញជារូបរាងហើយក្តី តែកិច្ចសំណេះសំណាលហាក់មានភាពខ្វែងគំនិតគ្នាខ្លះៗ ស្តីពីអ្វីដែលជារបៀបវារៈ ត្រូវលើកយកមកនិយាយ និងអំពីភាពមិនច្បាស់លាស់ថា តែការជួបជុំគ្នានេះផ្តោតលើប្រធានបទអ្វីសំខាន់ ។ ក៏ប៉ុន្តែទីបំផុតអង្គប្រជុំត្រូវបានរកច្រកចេញដោយការព្រមព្រៀងគ្នាលើការធ្វើបុណ្យរួមគ្នាមួយរវាងសមាគមនានា និងរាល់បណ្តាលគណបក្ស នយោបាយព្រមជាមួយ និងការចូលរួមពីសំណាក់គ្រប់វត្តអារាមទាំងអស់ ដើម្បីប្រមូលថវិកាជួយដល់ក្រុមគ្រួសារអ្នកស្លាប់ និងអ្នករងរបួសក្នុងឧបទ្ទវហេតុនៅលើស្ពានកោះពេជ្រនាពេលថ្មីៗកន្លងទៅនេះ ។ រីឯការបរិច្ឆេទ និងទីកន្លែងក្នុងការប្រារព្ធធ្វើបុណ្យរួមគ្នានេះ ពុំទាន់សម្រេចច្បាស់លាស់ណាមួយឡើយ ហើយប្រធានគណកម្មការរៀបចំធ្វើបុណ្យរួមគ្នានេះ ត្រូវបានអង្គប្រជុំសម្រេចផ្តល់ភារកិច្ច ហើយលោក ផល ឈឿន ជាអ្នកចាត់ចែង ។

សូមជម្រាបថា កិច្ចសំណេះសំណាលដ៏កម្រនេះបានប្រព្រឹត្តឡើយ កាលពីថ្ងៃសៅរ៍ទី៤ខែ ធ្នូ ឆ្នាំ២០១០ នៅវេលាម៉ោង ៥:៣០នាទី ល្ងាច និងបញ្ចប់នៅម៉ោង៦:៤៥នាទីល្ងាច នាទីស្នាក់ការសមាគមព្រឹទ្ធាចារ្យខ្មែរ-អាមេរិកាំង ស្ថិតនៅទីក្រុងហ្វីឡាដែលហ្វៀខាងត្បូង។ ចំពោះអ្វីដែលគួរឱ្យកត់សំគាល់បំផុតនោះ គឺការជួបជុំគ្នារវាងក្រុមអ្នកបំរើសង្គមខ្មែរជាច្រើនក្រុមដូចជាសហគមន៍ខ្មែរ សមាគមចាស់ព្រឹទ្ធាចារ្យខ្មែរ-អាមេរិកាំង.តំណាងវត្តសុរិយារង្សី. តំណាងវត្តព្រះពុទ្ធរង្សី.តំណាងវត្តព្រះពុទ្ធប្រទានពរ តំណាងវត្តប៉ាឡេលេយ្យ សាខាគណបក្សសិទ្ធិមនុស្ស សាខាគណបក្ស សម រង្ស៊ី សាខាគណបក្សប្រជាជនកម្ពុជា និងតំណាងចលនាមហាចក្រខម...។

បើយើងបែរក្រោយងាកមកស្តាប់ប្រសាសន៍ ម៉ៅ ម៉ន ជាសមាជិករបស់សមាគមចាស់ព្រឹទ្ធាចារ្យខ្មែរ-អាមេរិកាំង និងជាអ្នកកៀងគឱ្យមានជុំនួបនេះឡើយ បានឱ្យដឹងថា គោលបំណងសំខាន់ក្នុងការជួបជុំបែបនេះ គឺចង់បង្ហាញអំពីការរួបរួមសាមគ្គីគ្នារវាងខ្មែរ និងខ្មែរទោះបីជាបុគ្គលម្នាក់ៗមាននិន្នាការនយោបាយផ្សេងៗពីគ្នា ឬក្រុមផ្សេងៗគ្នាយ៉ាងណាក៏ដោយចុះ ហើយជំនួបបែបនេះ គួរតែមានក្នុងរយៈមួយខែម្តង ឬក៏២ខែម្តងអាស្រ័យលើការឯកភាពគ្នា ហើយយើងនឹងមិនលើកយកបញ្ហានយោបាយមកនិយាយឡើយ តែយើងនិយាយអំពីកិច្ចការណាដែលផ្តល់នូវផលប្រយោជន៍ដល់សង្គមជាតិ ៕

KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Eda Uong & Audria Chea**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**

**Sophal Meas**
*Branch Manager, New England*
**978-758-8547**

*Design Staffs:*
**Leang Heng & Doch Vuthy**
*Distributor:* **Chharly Young**

The Khmer Post, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Philadelphia, Pennsylvania.

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
U.A.M.G.
P.O. Box 24357
Philadelphia, Pa 19120

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនឿចំពោះព័ត៌មាន ព័ត៌មានត្រឹមត្រូវ

អត្ថបទជកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២៦ ខែវិច្ឆិកា ឆ្នាំ២០១០

# Fragrant Rice Prices Eyed as Harvest Begins

BY CHHORN CHANSY AND PAUL VRIEZE
THE CAMBODIA DAILY

At the start of this harvest season, rice farmers have begun by reaping varieties of the grain with the shortest growing cycle, and trading in fragrant rice—the dominant commercial short-term variety—has begun, officials and agriculture experts said yesterday.

Industry analysts say this year's favorable weather conditions could produce a bountiful harvest.

Chan Heng, administrative director at the Agriculture Ministry, said that on Nov 17 farmers had harvested 271,146 hectares of paddy, about 11 percent of the total 2,390,472 hectares planted nationwide this year.

Hean Vanhorn, deputy director general of the Ministry of Agriculture's general department of agriculture, said farmers had mostly started harvesting the short-term rice varieties, which have a growing cycle of about three months.

Phou Phuy, President of the Cambodian Rice Millers Association in Battambang province, said prices for fragrant rice currently stood at about 1,200 to 1,300 riel, or just over $0.30, per kg of unmilled rice, while lower quality rice varieties sold at 700 riel to 800 riel per kg, or about $0.20.

"Rice prices are similar to [November] last year," Mr Phuy said. "I expect rice prices will remain stable or increase. Prices will not go down because there is still high demand from foreign countries."

Yang Saing Koma, director of the Cambodian Center for Study and Development in Agriculture, agreed with Mr Phuy's price estimates. However, of prices offered by cross-border rice traders, he said: "In the northwest at the border with Thailand, the prices are higher than in the southeast near Vietnam."

Sim Sroy, a farmer at Prey Veng province's Ba Phnom district, said he had so far harvested 1 of his 4 hectares of paddy. Mr Sroy said although rice prices in his district were now slightly higher than last year, he would stock his rice until prices went up.

"Most farmers already sold their rice because they need money to pay back loans for chemical fertilizer and other things," he said.

# តម្លៃស្រូវក្រអូបត្រូវបានអង្កេតតាមដាន នៅពេលការប្រមូលផលស្រូវចាប់ផ្តើម

ដោយ ឆន ចាន់ស៊ី និង PAUL VRIEZE
THE CAMBODIA DAILY

ក្រុមមន្ត្រី និងអ្នកជំនាញខាងកសិកម្មបាននិយាយកាលពីម្សិលមិញថា នៅក្នុងការចាប់ផ្តើមនៃរដូវប្រមូលផលឆ្នាំនេះ កសិករដែលធ្វើដំណាំស្រូវបានចាប់ផ្តើមទទួលផលស្រូវប្រភេទផ្សេងៗគ្នាដែលដាំក្នុងរយៈពេលខ្លីបំផុត ហើយការទិញលក់ស្រូវក្រអូបដែលជាប្រភេទស្រូវពាណិជ្ជកម្មដែលសំខាន់ជាងគេបានចាប់ផ្តើមហើយ។ ក្រុមអ្នកវិភាគផ្នែកឧស្សាហកម្មបាននិយាយថា ស្ថានភាពអាកាសធាតុល្អនៅឆ្នាំនេះអាចនឹងធ្វើឱ្យការប្រមូលផលបានច្រើន។



លោក ចាន់ ហេង ប្រធានរដ្ឋបាលនៅក្រសួងកសិកម្មបានថ្លែងថានៅថ្ងៃទី១៧ ខែវិច្ឆិកា កសិករប្រមូលផលស្រូវបាន២៧១.១៤៦ ហិកតា គឺប្រហែល១១ភាគរយនៃស្រូបសរុបចំនួន២.៣៩០.៤៧២ ហិកតា ដែលត្រូវបានបង្កបង្កើនផលនៅទូទាំងប្រទេសនៅឆ្នាំនេះ។

លោក ហ៊ាន វ៉ាន់ហ៊ន ជាអគ្គនាយករងនៃអគ្គនាយកដ្ឋានកសិកម្មរបស់ក្រសួងកសិកម្មបានមានប្រសាសន៍ថា ប្រជាកសិករបានចាប់ផ្តើមប្រមូលផលភាគច្រើនជាប្រភេទស្រូវដាំក្នុងរយៈពេលខ្លីដែលមានរយៈពេលដាំដុះប្រហែល៣ខែ។

លោក ពូ ពុយ ជាប្រធានសមាគមរោងម៉ាស៊ីនកិនស្រូវកម្ពុជាក្នុងខេត្តបាត់ដំបង បានមានប្រសាសន៍ថា តម្លៃស្រូវក្រអូបនៅពេលបច្ចុប្បន្នមានតម្លៃប្រហែល១.២០០ រៀលទៅ១.៣០០រៀល ឬលើស០.៣០ដុល្លារបន្តិចក្នុងស្រូវមួយគីឡូក្រាម រីឯប្រភេទស្រូវផ្សេងៗដែលមានគុណភាពទាបជាងលក់បានតម្លៃពី៧០០រៀលទៅ៨០០រៀលក្នុងមួយគីឡូក្រាម ឬប្រហែល ០.២០ដុល្លារ។

លោក ពូ ពុយ បានមានប្រសាសន៍ថា "តម្លៃស្រូវពេលនេះស្រដៀងគ្នានឹងតម្លៃស្រូវកាលពី (ខែវិច្ឆិកា) ឆ្នាំមុន។ ខ្ញុំរំពឹងថា តម្លៃស្រូវនឹងនៅថេរ ឬកើនឡើង។ តម្លៃនឹងមិនចុះទៅកទេ ពីព្រោះនៅមានការតម្រូវការខ្ពស់ពីបណ្តាប្រទេសក្រៅនៅឡើយ។

លោក យ៉ង សាំងកុមារ ដែលជាប្រធានមជ្ឈមណ្ឌលសិក្សា និងអភិវឌ្ឍន៍កសិកម្មកម្ពុជា បានប៉ាន់ប្រមាណថា ប្រហែលមួយភាគបីនៃកសិករទាំងអស់ពឹងផ្អែកលើប្រភេទស្រូវដែលដាំដុះក្នុងរយៈពេលខ្លី និងរយៈពេលមធ្យម។ លោកបានយល់ស្របនឹងការប៉ាន់ប្រមាណពីតម្លៃរបស់លោក ពូ ពុយ ប៉ុន្តែចំពោះតម្លៃដែលឈ្មួញស្រូវឆ្លងកាត់ព្រំដែនផ្តល់ឱ្យវិញ លោកបានមានប្រសាសន៍ថា "នៅភាគពាយព្យឯនាយព្រំដែនជាមួយប្រទេសថៃតម្លៃស្រូវខ្ពស់ជាងតម្លៃស្រូវនៅក្នុងភាគអាគ្នេយ៍ជិតប្រទេសវៀតណាម"។

លោក ស៊ីម ស្រួយ ជាកសិករម្នាក់នៅស្រុកបាភ្នំ ខេត្តព្រៃវែង បាននិយាយថា រហូតមកទល់ពេលនេះគាត់បានប្រមូលផលមួយហិកតារួចហើយ ក្នុងចំណោមស្រូវចំនួន៤ហិកតារបស់គាត់។ លោក ស៊ីម ស្រួយ បាននិយាយថា បើទោះជាតម្លៃស្រូវនៅក្នុងស្រុករបស់គាត់នៅពេលនេះខ្ពស់ជាងឆ្នាំមុនបន្តិចក៏ដោយ ក៏គាត់នឹងស្តុបស្រូវរបស់គាត់ទុករហូតដល់តម្លៃកើនឡើងខ្ពស់ជាងនេះជារឿងមួយដែលកសិករភាគច្រើននៅក្នុងតំបន់នេះមិនអាចធ្វើបាន។

គាត់បាននិយាយថា "កសិករភាគច្រើនបានលក់ស្រូវរបស់ខ្លួនរួចទៅហើយ ពីព្រោះពួកគេត្រូវការលុយយកទៅសងថ្លៃជីគីមី និងទំនិញផ្សេងៗទៀត"៕

# Assembly Is Back to Buniness With Debate on 2011 Budget

BY EANG MENGLENG
THE CAMBODIA DAILY

Proving that the business of the state must go on, lawmakers met during yesterday's day of mourning and began to debate the country's almost $2.4 billion budget for 2011.

"This [budget] is very important and the assembly cannot delay it.... If the assembly delays, the King could not sign it on time," said SRP spokesman Yim Sovann. The assembly is to convene again today to continue the debate.

CPP lawmakers had predicted that the budget would sail through the chamber, but the session was interrupted as members from all parties took the opportunity to convey their sympathies for the victims of the Koh Pich tragedy.

"I, along with all other government officials and all the Cambodian people, feel deeply sorry for the families of the victims," said CPP lawmaker Cheam Yeap.

One of the main items discussed during yesterday's session was the government's plan to increase its foreign borrowing next year.

The budget includes a provision allowing the government to borrow up to 400 million Special Drawing Rights, up from about 200 million last year. Officials have said the increase will be used as a reserve fund in case of disasters or emergencies. SDR is a unit of currency used by the International Monetary Fund, currently worth $1.54 each.

These loans would start accruing interest after 10 years and would have to be paid back in 30 years, according to Mr Yeap.

The discussion split the chamber along party lines with CPP lawmakers almost unanimously calling for the budget to pass as it stands, while SRP members insisted on further discussion.

"We did not agree to take this law to debate because this is not a fair distribution of the budget," said the SRP's Mr Sovann.

About $501 million will be allocated to the social affairs sector. About $297 million will be spent on defense and security in 2011, while the economic sector—incorporating the ministries of Finance and Commerce, among others—has been allocated a budget of almost $115 million.

# សភាត្រឡប់ទៅបើកការពិភាក្សាដេញដោលអំពីថវិកាសម្រាប់ឆ្នាំ២០១១

ដោយ អ៊ាង ម៉េងឡេង
THE CAMBODIA DAILY

ដោយបង្ហាញថា ការងាររបស់រដ្ឋត្រូវតែដំណើរការទៅមុខនោះ ក្រុមសមាជិកសភាបានជួបជុំគ្នាអំឡុងថ្ងៃកាន់ទុក្ខកាលពីម្សិលមិញ ហើយបានចាប់ផ្តើមដេញដោលអំពីថវិកាសម្រាប់ឆ្នាំ២០១១ មានចំនួនជិត២.៤ពាន់លានដុល្លារ។



លោក យឹម សុវណ្ណ ជាអ្នកនាំពាក្យរបស់គណបក្សសម រង្ស៊ី បានមានប្រសាសន៍ថា "ថវិកានេះគឺសំខាន់ខ្លាំងណាស់ ហើយសភាមិនអាចពន្យារពេលបាននោះទេ។ ប្រសិនបើសភាពន្យារពេលព្រះមហាក្សត្រមិនអាចឡាយព្រះហស្តលេខាលើវាទាន់ពេលវេលាឡើយ"។ សភាត្រូវប្រជុំម្តងទៀតនៅថ្ងៃនេះ ដើម្បីបន្តការពិភាក្សាដេញដោលនេះ។

បណ្តាសមាជិកសភាមកពីគណបក្សប្រជាជន បានព្យាករណ៍ថវិកានេះនឹងឆ្លងផុតសភា ប៉ុន្តែសម័យប្រជុំសភាត្រូវបានបង្អាក់ដោយសារតែសមាជិកមកពីគ្រប់គណបក្សទាំងអស់បានឆ្លៀតឱកាសនេះ ដើម្បីសំដែងសមានទុក្ខរបស់ខ្លួនចំពោះជនរងគ្រោះនៃសោកនាដកម្មនៅកោះពេជ្រ។

លោក ជាម យៀប ជាសមាជិកសភាគណបក្សប្រជាជន បានមានប្រសាសន៍ថា "ខ្ញុំរួមជាមួយនឹងមន្ត្រីរដ្ឋាភិបាលគ្រប់រូប និងប្រជាជនកម្ពុជាទាំងអស់មានអារម្មណ៍សោកស្តាយយ៉ាងខ្លាំងចំពោះក្រុមគ្រួសាររបស់ជនរងគ្រោះ"។

បញ្ហាមួយក្នុងបញ្ហាសំខាន់ៗដែលត្រូវបានលើកយកមកពិភាក្សាអំឡុងសម័យប្រជុំពីម្សិលមិញនោះ គឺផែនការរបស់រដ្ឋាភិបាលក្នុងការបង្កើនកម្ចីបរទេសរបស់ខ្លួនឆ្នាំក្រោយ។

ច្បាប់ថវិកានេះរួមមានខមួយដែលអនុញ្ញាតឱ្យរដ្ឋាភិបាលខ្ចីរហូតដល់ទៅ៤០០លាន SDR គឺកើនឡើងពីចំនួនប្រហែល២០០លានកាលពីឆ្នាំមុន។

ក្រុមមន្ត្រីបាននិយាយថា ចំនួនកើនឡើងនេះនឹងត្រូវបានប្រើប្រាស់ជាមូលនិធិបំរុងមួយនៅក្នុងករណីដែលមានគ្រោះមហន្តរាយ ឬភាពអាសន្នកើតឡើង។ SDR ឬសិទ្ធិដកលុយពិសេសនេះ គឺជារូបិយប័ណ្ណមួយប្រភេទដែលត្រូវបានប្រើប្រាស់ដោយមូលនិធិរូបិយវត្ថុអន្តរជាតិដែលបច្ចុប្បន្នមានតម្លៃស្មើនឹង ១.៥៤ដុល្លារក្នុងមួយ SDR ។

យោងតាមលោក ជាម យៀប បានឱ្យដឹងថា កម្ចីទាំងនេះនឹងចាប់ផ្តើមដំឡើងការប្រាក់បន្ទាប់ពីរយៈពេល១០ឆ្នាំ ហើយត្រូវឱ្យសងវិញនៅក្នុងរយៈពេល៣០ឆ្នាំ។

ការពិភាក្សាដេញដោលនេះបានឆ្លងកាត់ការខ្វែងគំនិតគ្នាដោយសមាជិកសភាគណបក្សប្រជាជនកម្ពុជា បានជំរុញស្ទើរតែជាឯកច្ឆ័ន្ទឱ្យអនុម័តថវិកានេះដោយមិនបាច់មានការផ្លាស់ប្តូរ រីឯសមាជិកសភាមកពីគណៈណបក្ស សម រង្ស៊ីវិញ បានទទូចឱ្យមានការពិភាក្សាបន្ថែមទៀត។

លោក យឹម សុវណ្ណ មកពីគណបក្ស សម រង្ស៊ី បានមានប្រសាសន៍ថា "យើងមិនយល់ស្របជាមួយនឹងការយកច្បាប់នេះទៅពិភាក្សាដេញដោលឡើយពីព្រោះវាមិនមែនជាការបែងចែកថវិកាដ៏ត្រឹមត្រូវមួយនោះទេ"។

ថវិកាប្រហែល ៥០១ លានដុល្លារនឹងត្រូវលៃទុកសម្រាប់វិស័យសង្គមកិច្ចនៅឆ្នាំក្រោយ។ ប្រហែល២៩៧លានដុល្លារនឹងត្រូវចំណាយទៅលើវិស័យការពារ និងសន្តិសុខនៅក្នុងឆ្នាំ២០១១ រីឯវិស័យសេដ្ឋកិច្ច ដែលរួមមានក្រសួងហិរញ្ញវត្ថុ និងក្រសួងពាណិជ្ជកម្ម ព្រមទាំងស្ថាប័នផ្សេងៗទៀតនោះត្រូវបានលៃទុកនូវថវិកាជិត១១៥លានដុល្លារ៕




# KhmerPost USA

Printing The Cambodian World News

## Public Invitation

You are cordially invited to joining our Opening Ceremony in Massachusetts with entertainments that promise to bring much enjoyment.

The event takes place on :
Saturday, December 18, 2010 at 6:00pm-12:00 Midnight at Sompao Meas Hall, 450 Chelmsford Street, Lowell, Ma 01851



We will have dinner and drink available as well as entertainments that include performance by the famous Angkor Dance Troupe of Lowell, Comedy Show, and dancing through the night. Ticket is $35.00 per person. Please kindly confirm your attendance by Friday, December 17, 2010.

Khmer Post USA is please to share that Khmer Post Newspaper is an independent entity who does not discriminate against any political party or association. We aim to bridge relationships within the Cambodian community in the city of Lowell and the cities nearby as well as the community of family. Khmer Post Newspaper prints local community news, news from Cambodia, and international news. Khmer Post Newspaper makes every effort to practice and ensure the media freedom of speech, enormity in language, demonstrate cultural value, and reduce social isolation by content through publishing in Khmer and English. We published twice a month in Massachusetts and Pennsylvania.



Please contact Mrs. Pin Soben, Vice President at (267) 253-3947 or email at: KhmerPostUSA@gmail.com to confirm your attendance.




# COMPUTER+ LLC

SURVEILLANCE SYSTEM, COMPUTER RETAILER, REPAIR & SERVICES

ជំនាញការខាងជួសជុលកុំព្យូទ័រ លក់គ្រឿងកុំព្យូទ័រ
និងដាក់គ្រឿងឥតខ្សែសំរាប់ការពារសន្តិសុខ

REMOTE VIEWING

Remote Monitoring, Recording, Controlling through Internet from *anywhere* at *anytime*







5709 N. 5th St., Phila, PA 19120 Open: *Mon-Sat; 10am—6:00pm*
*Peter Hong Ching* * Tel: (215) 276-7000 * Fax: (215) 276-7001
E-mail: peterchng_99@yahoo.com www.computerplusllc.com

# DRANOFF ASSOCIATES

*Attorneys at Law*



"ដ្រាណុហ្វ អាសូស៊ីយេត (DRANOFF ASSOCIATE ) គឺជាមណ្ឌលការពារតាមផ្លូវច្បាប់ ដែលធ្វើការប្រកបដោយភក្តីភាព ដើម្បីតំណាងឱ្យអ្នករងគ្រោះ ដែលមានរបួសរូបរាងកាយ ។

ស្ទីវិន ដ្រាណុហ្វ (STEVEN DRANOFF) គឺជាមេធាវីនៅសាលាក្តីមានបទពិសោធន៍យ៉ាងខ្ពស់ខាងសេវាច្បាប់ ៣៥ឆ្នាំ ។

យើងធ្វើការដោយយកកំរៃពីការងារដែលប្រគល់ឱ្យលោកអ្នកមិនចាំបាច់ចេញថ្លៃចំណាយអ្វីមុននឹងលោកអ្នកទទួលប្រាក់សងពីមុខរបួសលោកអ្នកនោះទេ ។

ជំនួយខាងផ្លូវច្បាប់អាចផ្តល់ជូនជាភាសា ស្បាញ៉ូល ខ្មែរ វៀតណាម កូរ៉េ និង ចិន ។

- **របួសលើរាងកាយ :** គ្រោះថ្នាក់រថយន្ត, ឡានឈ្នួល "សិបគា", ឡានត្រឹក, តាក់ស៊ី, ជិះកង់, ថ្មើរជើង, រអិលដួលលើទឹកកក, លើចិញ្ចើមថ្នល់ ឬក្នុងអាគារលក់ទំនិញ, គ្រោះថ្នាក់ដោយបានទិញរបស់ខូចមកប្រើ ឬក៏ឆ្កែខាំ... ។
- **ការប្រហែសក្នុងវិជ្ជាជីវៈ និងសិទ្ធិរបស់អតិថិជន :** ព្យាបាលតាមវិជ្ជាពេទ្យពុំបានត្រឹមត្រូវ, មរណភាពឥតសមហេតុផល, វាយមាយក្នុងការថែទាំមនុស្ស... ។

DRANOFF ASSOCIATES

121 South Broad Street, Suit 1210, Philadelphia, PA 19107
215-732-3333 (phone) 215-732-8059 (fax)
sdranoff@dranofflaw.com

តមកពីទំព័រទី ០១

# ទង់ជាតិខ្មែរហូតឡើងហើយ...

ដែលមករស់នៅហ្វីឡាដែលហ្វៀនេះ ហើយទង់ជាតិជាសញ្ញារបស់ប្រជាជាតិមួយដែលរួបរួមគ្នា..."។ចំណែកឯលោក ហែម ហេង បានថ្លែងនៅក្រោមទង់ជាតិខ្មែរ ដែលទើបតម្លើងថ្មីថ្មោងថា " ទង់ជាតិខ្មែរ គឺជាសញ្ញានៃការរួបរួមគ្នា ដូច្នោះយើងត្រូវរួមរស់ជាមួយគ្នាដោយមិនប្រកាន់បក្សពួកឡើយ"។

សមាគមខ្មែរនៅទីក្រុងដ៏ចង្អៀត និងចម្រុះទៅដោយពហុជាតិសាសន៍មួយនេះ ជាអ្នកដើរតួដ៏សំខាន់មួយក្នុងរឿងទង់ជាតិខ្មែរនៅលើដងផ្លូវសាធារណៈនេះ។ ប៉ុន្តែទន្ទឹមគ្នានេះផងដែរសមាគមខ្មែរក៏បានទទួលរងនូវការរិះគន់ខ្លះៗ ពីមជ្ឈដ្ឋានមហាជនខ្មែរ ក្នុងសហគមក៏ដូចជាក្រុមអ្នកនយោបាយខ្មែររបស់សាខាគណបក្សប្រឆាំងទាំងពីរ គឺគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ជាដើម។

ការរិះគន់នេះបានផ្តើមឡើងនាថ្ងៃសម្ពោធតម្លើងទង់ជាតិខ្មែរនាថ្ងៃទី១៩ វិច្ឆិកាកន្លងមកនេះ ជាពេលដែលវត្តមានរបស់លោកឯកអគ្គរាជទូតខ្មែរប្រចាំសហរដ្ឋអាមេរិក គឺលោក ហែម ហេង បានចូលរួមជាអធិបតី។ ក្រុមអ្នករិះគន់ទាំងនោះបានបញ្ចេញនូវទស្សនៈស្រដៀងៗគ្នាថា សមាគមខ្មែរហាក់យកចិត្តយកថ្លើមដល់មន្ត្រីគណបក្សប្រជាជនយ៉ាងខ្លាំង ព្រោះគ្មាហេតុផលណាមួយក្នុងការអញ្ជើញលោកឯកអគ្គរាជទូតឱ្យចូលរួមជាអធិបតីក្នុងពិធីសម្ពោធតម្លើងទង់ជាតិខ្មែរ នាឱកាសនោះឡើយ។ ទាំងអស់នេះត្រូវបានមជ្ឈដ្ឋានខ្មែរមួយចំនួននិយាយថា ជាចំណុចមិនប្រក្រតីមួយដែលគួរឱ្យមានការមន្ទិល។



វីករាយនឹងទទួលទង់ជាតិខ្មែរនៅហ្វីឡាដែលហ្វៀ



លោក ម៉ាកិល ណាទ័រ ថ្លែងទៅកាន់អ្នកចូលរួម

អ្នកស្រី រ៉ង ស៊ន នាយិកាប្រតិបត្តិសមាគមខ្មែរ បានសរសេរអ៊ីមែលពន្យល់ពីហេតុការណ៍ដែលបានកើតឡើងថា "មានអ្នកខ្លះ មិនសប្បាយចិត្ត ហើយខឹងនឹងខ្ញុំដែលបានជួយកិច្ចការសាលាក្រុង ដើម្បីអញ្ជើញលោកអគ្គរាជទូតខ្មែរប្រចាំសហរដ្ឋអាមេរិកឱ្យមកចូលរួមពិធីបំពាក់ទង់ជាតិ និងចូលសញ្ជាតិកាលពីថ្ងៃសុក្រ ទី១៩ ខែវិច្ឆិកានេះ។ ខ្ញុំអាចយល់បានពីការរំជួលចិត្តរបស់លោកអ្នកចំពោះរឿងរដ្ឋាភិបាលមិនយកចិត្តទុកដាក់ឆ្លើយចំពោះកង្វល់របស់លោកអ្នក ហើយ



សម្រាប់អ្នកដែលមកពីគណបក្សប្រឆាំងបានយល់ថា សមាគមខ្មែរប្រកាន់បក្សមួយជាងមួយទៀត ខ្ញុំសូមជម្រាបថា ខ្ញុំតែងតែប្រកាន់យកមាគ៌ាមិនប្រកាន់បក្សពួកជានិច្ច ហើយទោះជាទៅថ្ងៃមុខក៏នៅតែយ៉ាងនេះដែរ។ ទង់ជាតិខ្មែរដែលបានបង្ហូតឡើងក្នុងចំណោមទង់ជាតិរាប់រយនៅផ្លូវ (បិនជើមិន ហ្វ្រង់គ្លីន ប៉ាវេយ) បានធ្វើឱ្យយើងទាំងអស់គ្នាមានមោទនភាពណាស់... ទោះជាយើងចង់ ឬមិនចង់សាលាក្រុង និងរដ្ឋាភិបាលអាមេរិកាំង បានទទួលស្គាល់រដ្ឋាភិបាលខ្មែររួចទៅហើយដែរ..." អាចនិយាយបានថា ជាប្រវត្តិសាស្ត្រដ៏សំខាន់មួយរបស់សមាគម ហើយក៏ជាមោទនភាពពន់ពេកសម្រាប់ពលរដ្ឋខ្មែរ ឬខ្មែរអាមេរិកាំងស្ថិតនៅក្នុងសមាគមខ្មែរនាទីក្រុងហ្វីឡាដែលហ្វៀ ដោយនាពេលថ្មីៗនេះ ទង់ជាតិខ្មែរត្រូវបានបង្ហូតខ្លួនជាសាធារណៈជាមួយនិងទង់ជាតិនៃបណ្តាប្រទេសផ្សេងៗជាច្រើនទៀត នៅចំកណ្តាលបេះដូងនៃក្រុងហ្វីឡាដែលហ្វៀស្ថិតនៅលើដងវិថី Benjamin Franklin Parkway ។

អ្នកចូលរួមម្នាក់ គឺលោក ត្រៃ ហ៊ូល បានមានប្រសាសន៍ថា ក្នុងកិច្ចប្រជុំមួយនាថ្ងៃអាទិត្យ ទី២ ខែវិច្ឆិកាកន្លងមកនេះថា : លោកមានការ



លោក ហែម ហេង    ព្រះតេជគុណ រដ្ឋមុនី

ខកចិត្តយ៉ាងខ្លាំងដោយឃើញលោក ហែម ហេង នាឱកាសនោះ។ លោកបានបន្តថា : លោកចង់ត្រឡប់មកផ្ទះវិញភ្លាមៗ ព្រោះមិនចង់ឃើញលោក ហែម ហេង ជាមនុស្សរបស់គណបក្សកុម្មុយនីស្តឡើយ តែដោយសារមានចិត្តចង់ចូលរួមក្នុងពិធីតម្លើងទង់ជាតិខ្មែរ ឱ្យចប់ចុងចប់ដើមសិនទើបលោកទ្រាំនៅទីនោះទាំងលំបាកក្នុងចិត្ត។

រីឯប្រធានសមាគមខ្មែរ ដែលមានទំនោរទៅខាងគណបក្សសិទ្ធិមនុស្សគឺលោក សម សុរិត បានថ្លែងថា : លោកមិនបានទៅចូលរួមក្នុងពិធីដ៏សំខាន់សម្រាប់សមាគមខ្មែរនោះឡើយ ហើយក្នុងនាមលោកជាប្រធានសមាគមខ្មែរ លោកក៏មិនបានអញ្ជើញលោកឯកអគ្គរាជទូតខ្មែរ ហែម ហេង ឱ្យចូលរួមក្នុងពិធីសម្ពោធនោះឡើយដោយ



កិច្ចការនោះ ត្រូវនាយិកាប្រតិបត្តិគឺអ្នកស្រី រ៉ង ស៊ន ជាអ្នកចាត់ចែងទាំងអស់។ (សូមបញ្ជាក់ថា អ្នកស្រី រ៉ង ស៊ន ជាភរិយារបស់សមាជិកថ្មីថ្មោងនៃសកម្មជនគណបក្សប្រជាជនកម្ពុជា គឺលោក ជិន វត្ថា)។

លោក វិសាខា ពេជ្រ ជាបុគ្គលិកបំរើការក្នុងសាលារៀនមួយកន្លែងនាទីក្រុងហ្វីឡាខាងត្បូង និងជាអគ្គលេខាធិការរបស់សាខាគណបក្សសិទ្ធិមនុស្សប្រចាំទ្វីបអាមេរិកខាងជើងបានថ្លែងថា : លោកនិងមិត្តភក្តិរបស់លោកមួយចំនួនទៀតក៏ត្រៀមរួចជាស្រេច ដើម្បីទៅចូលរួមក្នុងពិធីសម្ពោធទង់ជាតិខ្មែរនោះដែរ តែដោយឮដំណឹងថាលោក ហែម ហេង មានវត្តមាននៅទីនោះដែរ ទើបលោកនិងមិត្តភក្តិឯទៀតដូរ



ចិត្តមិនទៅចូលរួមក្នុងពិធីដ៏សំខាន់សម្រាប់សង្គមខ្មែរនោះវិញ។ លោក វិសាខា បានបន្តថា : តាមពិតមានបងប្អូនខ្មែរ ច្រើនណាស់ចង់ចូលរួម ប៉ុន្តែពួកគាត់ត្រូវបានប្តូរចិត្តភ្លាមៗ ព្រោះដោយសារបានឮដំណឹងថា លោក ហែម ហេង នៅទីនោះដែរ។

បើងាកមកស្តាប់ទស្សនៈរបស់គ្រូគង្វាលម្នាក់ គឺលោក អ៊ូ តេង ដែលមានលំនៅដ្ឋាននៅទីក្រុងហ្វីឡាដែលហ្វៀខាងត្បូង បានគាំទ្រទាំងស្រុងចំពោះវត្តមានលោក ហែម ហេង ក្នុងឱកាសនោះ។ លោក តេង បានដាក់សំនួរថា : បើមិនចង់ឱ្យលោក ហែម ហេង ចូលរួមទេ តើយើងគួរតែយកនរណាវិញ ដើម្បីជាតំណាងសង្គមខ្មែរ ក្នុងទីក្រុងហ្វីឡាដែលហ្វៀយើងនេះ? ហើយការចូលរួមជាអធិបតីរបស់លោក ហែម ហេង នេះគឺគ្មានអ្វីជាការខុសឆ្គងឡើយ ព្រោះគាត់ជាឯកអគ្គរាជទូតខ្មែរ ប្រចាំសហរដ្ឋអាមេរិកដែលតំណាងឱ្យខ្មែរយើងទាំងអស់...។

ទន្ទឹមគ្នានេះផងដែរ ក្នុងនាមជាខ្មែរ "ខ្មែរប៉ុស្តិ៍" សូមសំដែងនូវក្តីអំណរដ៏ពន្លឹកចំពោះការបង្ហូតខ្លួនរបស់ទង់ជាតិខ្មែរ ក្នុងទីក្រុងហ្វីឡាដែលហ្វៀនេះ ព្រោះទង់ជាតិជាដួងព្រលឹងនៃជាតិសាសន៍ខ្មែរ ជាកិត្តិយសរបស់ខ្មែរ និងជាអ្វីៗទាំងអស់សម្រាប់ខ្មែរយើង។ ហើយសង្ឃឹមថា សមាគមហ្វីឡាដែលហ្វៀនឹងមានរឿងល្អៗ សម្រាប់ខ្មែរទាំងអស់ និងមានការរួបរួមគ្នា មិនលាបពណ៌ដាក់គ្នា ហើយចាប់ដៃគ្នាសាងសមាគមខ្មែរហ្វីឡាដែលហ្វៀ ឱ្យកាន់តែលេចធ្លោថែមទៀត ទោះបីជាយើងម្នាក់ៗប្រកាន់នូវបក្ស ឬក្រុមផ្សេងៗ ពីគ្នាយ៉ាងណាក៏ ៕

# HONG KONG Super Market

FAMER´S BEST

Newly Renovated. Added new section .
Clean and Improved management ! ទើបនឹងកែលំអរថ្មីឡើងវិញ
-បន្ថែមផ្នែកលក់ថ្មីទៀត ហាងស្អាត ហើយបង្កើនគុណភាព
គ្រប់គ្រង**Weekly Sale** លក់ចុះថ្លៃរៀងរាល់សប្តាហ៍

## HONG KONG SUPERMARKET (PA) WEEKLY PROMOTION ITEMS


















































































**571 ADAMS AVE.PHILADELPHIA, PA 19120 Tel : 215-7281300**
**Fax : 215-728-1600**

- ចំណាយ **$140** ដុល្លារ ទទួលបានអង្ករស្រូវសែ **25** ផោន
- ចំណាយ **$100** ដុល្លារ ទទួលបាននូវភេសជ្ជៈ ឬមីកញ្ចប់មួយប្រអប់ ( តម្លៃ **8.99** )
- ចំណាយ **$25** ដុល្លារ ទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

**OPEN 7DAY**
8:00-9:00

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណាំងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី២៦ ខែវិច្ឆិកា ឆ្នាំ២០១០

## Tourism Event Will Be Held on Koh Pich, Minister Says

Tourism Minister Thong Khon announced yesterday that the exhibition center on Koh Pich island will host the highlight exposition of the Asean Tourism Forum scheduled to take place in Phnom Penh in January despite Monday's tragedy. "It is far enough from the place of the incident that we will still celebrate the Travex exhibition at the center," said Mr Khon, who said on Wednesday that the ministry would consider moving the event to a new venue in the wake of the disaster. The Travex event at ATF 2011 is set to feature booths set up by over 400 tourism industry professionals who will pay between $1,760 and $2,150 to exhibit their wares on Koh Pich. Luu Meng, president of the Cambodia Hotel Association, said yesterday that nearly all the three- to five-star hotels in Phnom Penh had already been booked for the event, which is to begin on Jan 15. Government officials from many Southeast Asian nations are expected to attend the event to showcase their own offerings. *(Andrew Burmon)*

## រដ្ឋមន្ត្រី : វេទិកាទេសចរណ៍អាស៊ាននឹងត្រូវធ្វើឡើងនៅកោះពេជ្រ

ដោយ ADREW BURMON

THE CAMBODIA DAILY



លោក ថោង ខុន

លោក ថោង ខុន ជារដ្ឋមន្ត្រីក្រសួងទេសចរណ៍បានប្រកាសកាលពីម្សិលមិញថា មជ្ឈមណ្ឌលតាំងពិពណ៌រណ៍កោះពេជ្រនឹងទទួលរៀបចំវេទិកាទេសចរណ៍អាស៊ានដ៏សំខាន់ដែលគ្រោងធ្វើឡើងនៅក្នុងទីក្រុងភ្នំពេញ ក្នុងខែមករា ថ្វីបើមានសោកនាដកម្មកាលពីថ្ងៃច័ន្ទកើតមានក៏ដោយ។ "វានៅឆ្ងាយគួរសមពីកន្លែងកើតឧប្បត្តិហេតុនេះ ដូច្នេះយើងនឹងនៅតែអាចរៀបចំពិធីតាំងពិព័រណ៍ Travex នៅឯមជ្ឈមណ្ឌលនេះបាន" នេះបើយោងតាមលោក ថោង ខុន ដែលបានថ្លែងកាលពីថ្ងៃពុធថា ក្រសួងនឹងពិចារណាអំពីការផ្លាស់ព្រឹត្តិការណ៍នេះទៅធ្វើនៅកន្លែងថ្មីមួយ ក្រោយពីមានគ្រោះថ្នាក់នេះកើតឡើង។ ព្រឹត្តិការណ៍តាំងពិព័រណ៍ Travex នៅឯវេទិកាទេសចរណ៍អាស៊ានឆ្នាំ២០១១ ដែលមានស្តង់ជាច្រើនដែលដំឡើងដោយអ្នកជំនាញខាងឧស្សាហកម្មទេសចរណ៍ជាង៤០០នាក់ ដែលនឹងត្រូវបង់លុយពីចន្លោះ១.៧៦០ដុល្លារទៅ២.១៥០ដុល្លារ ដើម្បីតាំងពិព័រណ៍នូវទំនិញរបស់ខ្លួននៅលើកោះពេជ្រ។ លោក លូ ម៉េង ជាប្រធានសមាគមសណ្ឋាគារកម្ពុជា បានថ្លែងកាលពីម្សិលមិញថា ស្ទើរតែទាំងអស់នៃសណ្ឋាគារលំដាប់ផ្កាយ៣ និងផ្កាយ៥ក្នុងទីក្រុងភ្នំពេញ ត្រូវបានកក់ទុករួចរាល់ហើយសម្រាប់ព្រឹត្តិការណ៍នេះ ដែលនឹងត្រូវចាប់ផ្តើមនៅថ្ងៃទី១៥ ខែមករា។ ក្រុមមន្ត្រីរដ្ឋាភិបាលមកពីប្រទេសជាច្រើននៅអាស៊ីអាគ្នេយ៍ត្រូវគេរំពឹងថា នឹងចូលរួមក្នុងព្រឹត្តិការណ៍នេះដើម្បីបង្ហាញពីផលិតផលរបស់ពួក គេ៕

# សមាគមខ្មែរ នៃរដ្ឋរ៉ូដអៃឡិន

ហេង សុវណ្ណ



•••រដ្ឋរ៉ូដអៃឡិនមានប្រជាពលរដ្ឋខ្មែររស់នៅប្រមាណជិតមួយម៉ឺននាក់។ បានបង្កើតជាសមាគមដែលមានឈ្មោះថាសមាគមខ្មែរនៃរដ្ឋរ៉ូដ - អៃឡិន (Cambodian Society of Rhode-Island, Inc.) ហៅកាត់ថា CSRI. សមាគមនេះបានបង្កើតឡើងតាំងពីឆ្នាំ១៨១មកម្ល៉េះ បើគិតមកដល់សព្វថ្ងៃនេះ សមាគមនេះមានអាយុកាលជាង២៩ឆ្នាំហើយ ។ សមាគមនេះ ធ្វើការបោះឆ្នោតជ្រើសរើសប្រធានសមាគមសម្រាប់អាណត្តិថ្មីរៀងរាល់ពីឆ្នាំម្តងហើយមានការដឹកនាំដោយប្រធានសមាគមខុសៗគ្នាជាច្រើនជំនាន់មកហើយដែរ ។ សមាគមនេះ ង្កើតឡើងក្នុងគោលបំណងជួយជនជាតិខ្មែរទាំងអស់ក្នុងផលប្រយោជន៍ដូចជាជួយតាំងទីលំនៅថ្មីដល់ជនភៀសខ្លួនខ្មែរទាំងឡាយណាដែលបានមកដល់រដ្ឋរ៉ូដអៃឡិននេះ បង្កើតទំនាក់ទំនងរវាងគ្នានឹងគ្នាឱ្យកាន់តែជិតស្និតបន្ថែមទៀត ទាំងនៅក្នុងរដ្ឋក៏ដូចជានៅរដ្ឋដទៃទៀត រៀបចំកម្មវិធីអប់រំផ្នែកអក្សរសាស្ត្រខ្មែរ សង្គមកិច្ច និងវប្បធម៌ខ្មែរ ។ ក៏ប៉ុន្តែមានប្រជាពលរដ្ឋមួយចំនួនបាននិយាយថា ការទំនាក់ទំនងរវាងសមាគម និងប្រជាពលរដ្ឋមានការខ្វះចន្លោះច្រើន មានបងប្អូនខ្មែរមួយចំនួនគាត់មិនទាន់ស្គាល់ថា អាស័យដ្ឋានរបស់សមាគមនៅឯណាផង។

លោក សំ សុខវណ្ណ អតីតប្រធានសមាគម ខ្មែរក្នុងអាណត្តិឆ្នាំ១៩៩៦ដល់ឆ្នាំ២០០០ បានរៀបរាប់ប្រាប់អ្នកយកព័ត៌មានយើងថា ក្នុងជំនាន់ដែលលោកជាប់ការបោះឆ្នោតជ្រើសរើសជាប្រធានសមាគម គឺមានតែមួយឆ្នាំប៉ុណ្ណោះ សម្រាប់មួយអាណត្តិ ប៉ុន្តែក្រោមមកក្នុងអាណត្តិនៃការដឹកនាំរបស់លោក លោកបានកែប្រែច្បាប់ថ្មី ដោយកំណត់រយៈពេល២ឆ្នាំសម្រាប់មួយអាណត្តិ ព្រោះលោកយល់ឃើញថា រយៈពេលមួយឆ្នាំគឺវាជាពេលខ្លីពេកសម្រាប់ការដឹកនាំសង្គមមួយ ហើយប្រធានមួយរូបមានសិទ្ធិឈរឈ្មោះជាបេក្ខជនប្រធានបាន៣អាណត្តិជាប់ៗគ្នា ។ ក្រោមការដឹកនាំរបស់លោក លោកបានបង្កើតស្នាដៃជាច្រើនសម្រាំសង្គមដូចជាការជួយប្រជាពលរដ្ឋខ្មែរចាស់ជរា ក៏ដូចជាជនពិការឱ្យទទួលបានប្រាក់ឧបត្ថម្ភប្រចាំខែ ហើយក្នុងនោះដែរលោកបានគម្រោងនឹងបង្កើតជាបណ្ណាល័យ និងសារមន្ទីរសម្រាប់ប្រជាពលរដ្ឋខ្មែរនៅរ៉ូដអានឡិន ក៏ប៉ុន្តែគម្រោងនេះត្រូវបរាជ័យដោយពុំមានថវិកាគ្រប់គ្រាន់។

យើងបានសាកសួរទៅលោក សំ សុខវណ្ណ បន្ថែមទៀតថា : តើលោកយល់ឃើញយ៉ាងម៉េចដែរចំពោះការដឹកនាំរបស់ប្រធានសមាគមខ្មែរបច្ចុប្បន្ន បើប្រៀបធៀបទៅនឹងការដឹកនាំរបស់អាណត្តិលោក ? លោកបានឆ្លើយថា : លោកមិនអាចធ្វើការប្រៀបធៀបការដឹកនាំរបស់អាណត្តិលោកនឹងការដឹកនាំរបស់ប្រធានសមាគមបច្ចុប្បន្នបានទេ ដោយលោកយល់ថា វាមានភាពមិនប្រក្រតីដោយការបោះឆ្នោតនោះបានប្រព្រឹត្តទៅដោយមិនត្រឹមត្រូវតាមលក្ខន្តិកៈ ហើយក្នុងពេលនោះដែរមានការប្រកាសមិនទទួលស្គាល់ការបោះឆ្នោតរហូតដល់មានការលាលែងពីតំណែងរបស់គណៈកម្មការរៀចំការបោះឆ្នោតមួយចំនួន។

រីឯលោក អ៊ុក កុសល ជាអតីតអគ្គលេខាធិការនៃសមាគមខ្មែរក្នុងអតីតរបស់លោក កែវ សំណាង បានរៀបរាប់ថា : ការដឹកនាំរបស់ប្រធានសមាគមបច្ចុប្បន្ន គឺមានភាពទន់ខ្សោយច្រើនគ្មានភាពទំនាក់ទំនងរវាងប្រជាណលរដ្ឋ និងសមាគមគ្មានសមត្ថភាពណាមួយដែលជាការបំរើផលប្រយោជន៍ដល់ប្រជាពលរដ្ឋខ្មែរ បើប្រៀបធៀបទៅនឹងការដឹកនាំរបស់ប្រធានសមាគមអាណត្តិមុនៗ។ នៅក្នុងអាណត្តិមុនគឺមានការរៀបចំកម្មវិធីបង្រៀនអក្សរសាស្ត្រខ្មែរ និងបង្កើតជាក្រុមកីឡាបាល់ទាត់ជាដើម សម្រាប់អប់រំខ្មែរនៅរដ្ឋរ៉ូដអៃឡិន ផ្ទុយទៅវិញប្រធានសមាគមសព្វថ្ងៃ គឺប្រកាន់បក្សពួកនិយមដោយលោកលើកជាឧទាហរណ៍ដូចជាការប្រកាន់វត្តនេះទៅវត្តនេះមិនទៅ។

សូមបញ្ជាក់ថា សព្វថ្ងៃវត្តនៅក្នុងរដ្ឋរ៉ូដ នៃឡិន គឺមានបី : ទីមួយ វត្តធម្មិការាម ហៅ វត្តចាស់ ទីពីរ វត្តពុទ្ធមណ្ឌល ហៅវត្តកណ្តាល និងទីបី វត្តឃោសនារាម ហៅវត្តទី៣។

លោក ផាន់ សារឿន ជាអតីតប្រធានហិរញ្ញវត្ថុនៃសមាគមខ្មែរក្នុងអាណត្តិរបស់លោក កែវ សំណាង ដដែលបានរៀបរាប់ឱ្យដឹងដែរថា ការដឹកនាំរបស់ប្រធានសមាគមបច្ចុប្បន្ន គឺមានរឿងអាស្រូវច្រើន ដូចជាការចាយវាយខ្ជះខ្ជាយមានដូចជាការចំណាយទៅលើថ្លៃឈ្នួលការិយាល័យសព្វថ្ងៃដែលមានតែការិយាល័យមិនមានមនុស្សធ្វើការ។ ម្យ៉ាងទៀត ប្រកាន់បក្សពួកនិយម គ្រួសារនិយម ដែលសមាជិកមួយចំនួនជាកូនក្មួយរបស់គាត់។

នៅលើការចោទប្រកាន់ខាងលើលោក រ័ត្ន សារិន ប្រធានសមាគមខ្មែរបច្ចុប្បន្នបានមានប្រសាសន៍បកស្រាយនូវមតិខ្វែងគំនិតខាងលើយ៉ាងដូច្នេះថា : សមាគមខ្មែរនៅរដ្ឋរ៉ូដអៃឡិន្ត គឺមានភាពចុះខ្សោយចាប់តាំងតែពីឆ្នាំ២០០៤ ក្នុងអាណត្តិរបស់លោក អ៊ឹម សុផុន មកម្ល៉េះ មិនមែនទើបតែចាប់ផ្តើមក្រោមការគ្រប់គ្រងរបស់លោកនោះទេ។ ចាប់តាំងពីឆ្នាំ២០០៤ មកជំនួយដែលសមាគមធ្លាប់ទទួលបានពីមុនត្រូវបានកាត់ផ្តាច់ ដែលនេះជាហេតុផលធ្វើឱ្យការដឹកនាំសមគមមានភាពទន់ខ្សោយ ។ លោកបានបញ្ជាក់បន្ថែមទៀតថា នៅក្នុងការដឹកនាំរបស់លោក គឺមានគម្រោងបង្កើតនូវកម្មវិធីអប់រំសង្គមកិច្ច វប្បធម៌ជាដើម។ល។ ក៏ប៉ុន្តែផែនការទាំងនោះមិនអាចធ្វើទៅបាន ដោយពុំមានថវិកាសម្រាប់ដំណើរការ។ លោកបានលើកឡើងថា ចំណូលរបស់សមាគមគឺមានចំនួនត្រឹមត្រូវ១៤០០ដុល្លារប៉ុណ្ណោះក្នុងមួយខែដែលចំណូលនេះបានមកពីការជួលផ្ទះមួយខ្នងដែលមានអាស័យដ្ឋានលេខ ១៦៨ ផ្លូវហ៊ានអ៊ូវី ដែលជាកេរ្តិ៍តំណែលដែលបន្សល់ទុកក្នុងអាណត្តិរបស់លោក សំ សុខវណ្ណ។ ចំពោះចំណូលដែលបានមកនោះគឺធ្វើការចំណាយទៅលើក្រុមហ៊ុនធានារ៉ាប់រងផ្ទះនិងថ្លៃជួលការិយាល័យសម្រាប់សមាគម។

ហើយលោកបានបន្ថែមទៀតថា លោកមិនមែនជាបក្សពួកនិយមនោះទេ លោកតែងតែឈឺឆ្អាលនិងខ្វាស់ខ្វែងជួយប្រជាពលរដ្ឋដែលជួបប្រទះនូវទុក្ខលំបាក។ ហើយហេតុផលដែលលោកយកកូនក្មួយរបស់ខ្លួនមកបំរើក្នុងជួរគណៈកម្មការ គឺដោយសារតែមានការខ្វះខាតផ្នែកធនធានមនុស្សសម្រាប់បំរើការងារនេះ ព្រោះយើងដឹងហើយថា ការបំរើការងារនៅក្នុងសង្គមខ្មែរគឺធ្វើឡើងដោយការស្ម័គ្រចិត្ត គឺពុំ មានប្រាក់បៀវត្សអីនោះទេ។ ដូច្នេះពុំសូវមាននរណាម្នាក់ចង់បំរើការងារនេះប៉ុន្មានឡើយ។ ហើយជាចុងក្រោយលោកក៏សូមអំពាវនាវដល់ប្រជាពលរដ្ឋទាំងអស់ដែលរស់នៅក្នុងរដ្ឋរ៉ូដអៃឡិន្តចូលរួមបោះឆ្នោតជ្រើសរើសប្រធានសមាគមសម្រាប់អាណត្តិថ្មី ដែលនឹងប្រព្រឹត្តិទៅនៅថ្ងៃអាទិត្យទី២ ខែមករា ឆ្នាំ២០១១ ខាងមុននេះ វេលាម៉ោង ១០:០០នាទីព្រឹកដល់ម៉ោង ២:០០នាទីរសៀល ដែលមានទីតាំងនៅ West End Community Center 109 Bucklin st. Providence, RI 02907 ឱ្យបានច្រើនកុះករ៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

**•២២ សីហា** : បង្កើតអគ្គបញ្ជាការយោធារួមរវាងទំព័រសីហនុនិយម និងព័ទនិយមសឺងសាន ។ ឧត្តមសេនីយ៍ សាក់ស៊ុតសាខន ជានាយអគ្គបញ្ជាការ ។

**•២៤ សីហា** : បេសកកម្មរដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ចែកផ្សាយឯកសារមួយចុះហត្ថលេខាដោយ ខៀវ សំផន និយាយថា ប៉ុល ពត បានត្រូវតែងតាំងជាប្រធានវិទ្យាស្ថានជាន់ខ្ពស់ខាងកិច្ចការការពារជាតិ អង្គការនេះជាអង្គការស្រាវជ្រាវ និងអភិវឌ្ឍន៍ ។

**•៣ តុលា** : ខាងរដ្ឋាភិបាលកម្ពុជាប្រជាមានិតបង្កើតច្បាប់តម្រូវឱ្យពលរដ្ឋធ្វើទាហាន៥ឆ្នាំ សម្រាប់បុរសអាយុគ្រប់១៨ឆ្នាំឡើង ។ ត្រៀមបង្កើតកងចល័តភូមិឃុំ សម្រាប់យុវជន ស្ត្រីបុរសអាយុ១៦ឆ្នាំឡើងទៅ ។ កំណែរនេះអនុញ្ញាតឱ្យប្រមូលធនធានមនុស្សគ្រប់គ្រាន់សម្រាប់គម្រោង ក៥ ហើយក៏អាចកែនមនុស្សស៊ីវិលច្រើនម៉ឺននាក់ ទៅធ្វើការធ្ងន់ធ្ងរ ពុំអាចគេចផុតពីការរងគ្រោះដល់ជីវិតងាយស្រួលឡើយ ដូចជា គ្រុនចាញ់, នឿយហត់, ផ្ទុះមីនបង្កប់... ។ល ។

**•១០ តុលា** : បើកផ្សារថ្មីឡើងវិញ ។

**•១៣-១៦ តុលា** : មហាសន្និបាតបក្សប្រជាជនគឺជាព្រឹត្តិការណ៍នយោបាយដ៏សំខាន់បំផុតមួយគិតចាប់ពីឆ្នាំ១៩៧៩មក ។ មានបុគ្គលិកថ្មីៗ ជាច្រើនចូលមកកាន់ការងាររដ្ឋ មានទាំងអ្នកដែលពុំមានប្រវត្តិជាមនុស្សរបស់បក្សកុម្មុយនិស្តទេ ហើយខ្លះទៀតធ្លាប់ជា "សត្រូវនៃវណ្ណៈអធន" នាឆ្នាំ១៩៧៥-១៩៧៩ ទៀតផង ។ រចនាសម្ព័ន្ធបក្សបានត្រូវរៀបក្នុងកិរិតខេត្ត និងស្រុកភូមិបានច្រើន ។

**•១៨ តុលា** : មរណភាពរបស់ លន់ នល់ ក្នុងអាយុ ៧២ឆ្នាំ នៅកាលីហ្វ័រញ៉ា ។

**•៩ វិច្ឆិកា** : មហាសន្និបាត អ.ស.ប អនុម័តទទួលស្គាល់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ក្នុងសម្លេងព្រម ១១៤ ប្រឆាំង ២១ និងអនុប្បវាទ១១៦ ។

**នៅឯក្រៅប្រទេសកម្ពុជា**

រដ្ឋាភិបាលចំរុះបង្កើតនៅក្រុងកូឡាឡាំពួ (ម៉ាឡេស៊ី) នាឆ្នាំ១៩៨២ រួមមានបក្សកម្ពុជាប្រជាធិបតេយ្យ (ក.ប) បក្សហ៊្វុនស៊ិនប៉ិច (ហ្វ) និងរណសិរ្សរំដោះប្រជាពលរដ្ឋខ្មែរ (រ.ជ.ប.ខ) ហៅថា "រដ្ឋាភិបាលចំរុះកម្ពុជាប្រជាធិបតេយ្យ" ។ រដ្ឋាភិបាលនេះត្រូវទទួលស្គាល់ដោយអង្គការសហប្រជាជាតិថាជាតំណាងស្របច្បាប់តែមួយគត់នៅកម្ពុជា ហើយមានសមាសភាពដូចតទៅ :

. ប្រធាន : នរោត្តម សីហនុ
. នាយករដ្ឋមន្ត្រី : សឺន សាន
.អនុប្រធាន និងជារដ្ឋមន្ត្រីការបរទេស : ខៀវ សំផន

**. គណៈកម្មាធិការនានាមាន :**

.ហិរញ្ញវត្ថុ : អៀង សារី (ក.ប)
: ប៊ូ ហៃល (ហ្វ)
: ប៊ុន សាយ (រ.ជ.ប.ខ)
. ការពារជាតិ : សុន សេន (ក.ប)
: អ៊ិន តាំ (ហ្វ)
: អ៊ឹមឈូដេត(រ.ជ.ប.ខ)
.វប្បធម៌ និងអប់រំ : ធុច រិន (ក.ប)
: ចក់ សារឿន (ហ្វ)
: ឆ្វយ វី (រ.ជ.ប.ខ)
. សុខាភិបាល និងសង្គមកិច្ច : ជូន នឿន (ក.ប)
: នរោត្តម ចក្រពង្ស (ហ្វ)
: ប៊ូ ខេង (រ.ជ.ប.ខ)

**•៣ ធ្នូ** : កិច្ចប្រជុំចលនាត្រីភាគីនៅប៉េកាំង រកដំណោះស្រាយទំនាស់រវាងក្រុមទាំងអស់ និងដំណោះស្រាយផ្ទៃក្នុងដែលមានសភាពធ្ងន់ធ្ងរដូចជាក្រុមលោក សឺង សាន ។

**•១៧ ធ្នូ** : ឧត្តមសេនីយ៍ សាកស៊ុត សាខន និងថ្នាក់ដឹកនាំ១២រូបទៀត ប្រកាសប្រឆាំងនឹងប្រធានចលនារំដោះ គឺលោក សឺង សាន ។

**•២៧ ធ្នូ** : សន្ធិសញ្ញាខ្មែរ-វៀតណាម បានត្រូវចុះហត្ថលេខាស្តីពីបញ្ហាកំណត់ព្រំប្រទល់ដែន ។

**•២៩ ធ្នូ** : ការបែកចលនារំដោះ FNLPK ចលនាលោក សឺង សាន ជាពីរ ។ អតីតនាយរដ្ឋមន្ត្រី ហ៊ុយ កន្ធុយ ដឹកនាំចលនាបំបែកខ្លួនមួយដាច់ពីលោក សឺង សាន ។

**•ឆ្នាំ ១៩៨៦**

**•១៣ មករា** : ប៉ះទង្គិចផ្ទុះអាវុធរវាងទ័ពវៀតណាម និងកម្ពុជាប្រជាធិមានិតនៅកោះកុង ។ បើកជំរំភៀសខ្លួននៅ អូត្រាវ គ្រប់គ្រងដោយក្រុមខ្មែរក្រហម ។

**•៧ កុម្ភៈ** : សន្និបាតសភា រដ្ឋកម្ពុជាប្រជាមានិតបន្តអាណត្តិដោយខ្លួនឯងរហូតដល់ឆ្នាំ១៩៩១ ។

**•១៧ មីនា** : ប្រជុំកំពូលរបស់រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ ហើយអំពាវនាវទ្វេរលក្ខខណ្ឌ ៨ ចំណុច សម្រាប់ដោះស្រាយទំនាស់កម្ពុជា : ១-ដកទ័ពវៀតណាមចេញពីកម្ពុជា ។ ឱ្យវៀតណាមចរចាជាមួយ "ត្រីភាគី" ។ ២- ពេលដកទ័ព ឱ្យក្រាសឈប់បាញ់គ្នា ។ ៣- ការដកទ័ពត្រួតពិនិត្យដោយអ្នកសង្កេតការរបស់ អ.ស.ប ។ រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យ និងរដ្ឋកម្ពុជាប្រជាមានិត បង្កើតរដ្ឋាភិបាលចំរុះមួយដែលមាន សីហនុ ជាព្រះប្រធាន និង សឺង សាន ជានាយករដ្ឋមន្ត្រី ។ ៥- បោះឆ្នោតសកលសេរី គ្រប់គ្រងដោយ អ.ស.ប ។ ៦- អធិបតេយ្យភាព និងអព្យាក្រិតភាពនៃកម្ពុជាត្រូវធានាដោយ អ.ស.ប ក្នុងរយៈពេលពីរទៅបីឆ្នាំ ។ ៧- ជំនួយសម្រាប់កសាងជាតិ អាចទទួលបានពីគ្រប់ប្រទេស ។ ៨- កម្ពុជា និងវៀតណាមចុះហត្ថលេខាលើសន្ធិសញ្ញាមិនរំលោភគ្នា ហើយនឹងរួមរស់ដោយសន្តិភាព ។ ចិន និងប្រទេសអាស៊ានគាំទ្រសេចក្តីប្រកាសនោះ តែខាងរដ្ឋកម្ពុជា និយាយថា គឺជាការជ្រៀតជ្រែកយ៉ាងសទ្ធឹកសទ្ធាប់ រីឯវៀតណាមបង្ហាញថា គឺជាឥទ្ធិពលរបស់ប្រទេសចិន តែក៏មិនទាត់ចោលសំណើនោះដែរ ។

**•២៨ មីនា** : ផ្ទុះអាវុធយ៉ាងខ្លាំងក្លានៅបាត់ដំបង ។

**•២៦ មេសា** : កិច្ចព្រមព្រៀងពាណិជ្ជកម្ម ចុះហត្ថលេខារវាងរដ្ឋកម្ពុជា និងសូវៀត ។

**•១ ឧសភា** : លោក សឺង សាន ចេញប្រកាសថ្មីទៀតថា មានជនជាតិយួន៧០ម៉ឺននាក់មករស់នៅលើដីកម្ពុជា ការពារដោយកងទ័ព ១៨ម៉ឺននាក់ និងទីប្រឹក្សាយួន២ម៉ឺននាក់ ។

**•២៨ ឧសភា** : រដ្ឋាភិបាលកម្ពុជាប្រជាធិបតេយ្យទទួលការគាំទ្រ សំណើរ៨ចំណុចដោយប្រទេសចំនួន ៤០ ។ (តទៅលេខក្រោយ)




# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**៩៨-** ព្រះសិទ្ធត្ថជាអម្ចាស់ទ្រង់បន្តថា : "បើជនណាចង់បានមេត្តាសន្តោសប្រោសប្រណីពីអ្នកណាម្នាក់ ជននោះគួរតែចែករំលែកផ្សព្វផ្សាយមេត្តាប្រោសប្រណីរបស់ខ្លួនដល់អ្នកដទៃ ព្រោះតាមច្បាប់ ហេតុនិងផល បើអ្នកសំលាប់គេនឹងត្រូវគេសំលាប់វិញ ។ ដោយបំព្រួញមកថា ប្រសិនបើយើងចង់បានសេចក្តីសុខទៅអនាគត យើងមិនត្រូវធ្វើអំពើដែលនាំឱ្យមានទុក្ខទោសដោយប្រការណាមួយដល់មនុស្សសត្វទាំងពួងទេ ។ បុគ្គលណាដែលសាបព្រោះពូជ គឺសេចក្តីទុក្ខ និងការឈឺចាប់បុគ្គលនោះនឹងទទួលផលនៃពូជនោះវិញយ៉ាងពិតប្រាកដឥតសង្ស័យ" ។

**៩៩-** ព្រះបន្ទូលដែលព្រះសិទ្ធត្ថទ្រង់ចំពោះព្រះរាជា ក្រុមអ្នកគោរពបូជាព្រះអគ្គី ព្រមទាំងប្រជាជនក្រុងរាជគ្រឹះធ្វើឱ្យអ្នកទាំងនោះពោរពេញដោយសុខសន្តិភាព និងជាវាចាដ៏សប្បុរសឧត្តមថ្លៃថ្នូរថែមទាំងពោរពេញទៅដោយមេត្តាករុណាទៀតផង ដូចគ្នាដេរព្រះវាចាជាព្រះវាចាមានប្រសិទ្ធិភាព និងប្រាកដប្រជា ។ ព្រះអង្គបានសំដែងធម៌ធ្វើឱ្យព្រះមហាក្សត្រ និងពួកព្រាហ្មណ៍ទាំងឡាយដែលនិយមគោរពពិធីបូជាយញ្ញនេះផ្លាស់ចំណង់ និងជំនឿរបស់ខ្លួន ។ ដោយទ្រង់បានព្រះសណ្តាប់មានព្រះទ័យជឿជាក់ដូច្នោះហើយ ព្រះបាទពិម្ពិសារទ្រង់ក្រាប់ថ្វាយបង្គំអារាធនានិមន្តព្រះសិទ្ធត្ថឱ្យគង់នៅក្នុងប្រទេសរបស់ព្រះអង្គដើម្បីបានបង្រៀនដល់ប្រជារាស្ត្ររបស់ព្រះអង្គឱ្យមានមេត្តាករុណា និងចេះស្រឡាញ់ការពារអាយុជីវិតចំពោះពួកសត្វទាំងឡាយ ។ ព្រះសិទ្ធត្ថទ្រង់សំដែងនូវកតញ្ញូតាធម៌ដឹងគុណយ៉ាងជ្រាលជ្រៅ ដល់ព្រះរាជាចំពោះព្រះអំណោយរបស់ព្រះអង្គ ប៉ុន្តែ ដោយហេតុថា ព្រះសិទ្ធត្ថមិនទាន់បានសម្រេចនូវសម្មាសម្ពោធិញ្ញាណពេញបរិបូរណ៍ ព្រះអង្គទ្រង់បដិសេធមិនទទួលនូវការនិមន្តរបស់ព្រះរាជា ហើយទ្រង់ក៏និមន្តយាងចេញទៅ ។

**១០០-** កាលបើយាងចេញពីក្រុងរាជគ្រឹះហើយ ព្រះសិទ្ធត្ថទ្រង់បន្តដំណើរឆ្ពោះទៅកាន់កន្លែងដែល **អារទកាលាមៈ** តាបសគង់នៅដែលជាអ្នកបានបង្កើតឱ្យមានគ្រឹះស្ថានសិក្សាជាច្រើនសម្រាប់ការសិក្សារៀនសូត្ររាល់មុខវិជ្ជាទាំងឡាយ ។ ព្រះសិទ្ធិត្ថបានគង់នៅទីនោះជាមួយ អារទ-កាលាមៈតាបស ហើយសិក្សាចំណេះវិជ្ជាក្នុងសំណាក់តាបសរូបនោះ ដោយយកព្រះទ័យទុកដាក់បំផុត ។ មិនយូរប៉ុន្មានចំណេះវិជ្ជា និងសមត្ថភាពរបស់ព្រះអង្គក៏បានចេះចាំស្មើនឹងគ្រូរបស់ព្រះអង្គ ហើយព្រះអង្គត្រូវបានគេទទួលស្គាល់ថាជាសិស្សដ៏ឆ្នើម និងមានគុណសម្បត្តិល្អម្នាក់រស់តាបសនោះ ហើយក៏ជាព្រឹត្តិការណ៍មួយធ្វើឱ្យអារទកាលាមៈតាបសសប្បាយរីករាយយ៉ាងខ្លាំង ។

**១០១-** ថ្ងៃមួយតាបសអារទកាលាមៈនិយាយទៅកាន់ព្រះសិទ្ធត្ថថា : "ឥឡូវនេះព្រះអង្គបានចេះដឹងនូវអ្វីៗសព្វយ៉ាងទាំងអស់ដែលទូលព្រះបង្គំចេះ ហើយព្រះអង្គអាចបង្រៀនបានដូចខ្ញុំដែរ ។ អ្វីដែលខ្ញុំចេះព្រះអង្គទ្រង់បានចេះយ៉ាងច្បាស់លាស់ស្មើនឹងខ្ញុំព្រះអង្គ ។ មានភាពខុសគ្នាបន្តិចបន្តួចប៉ុណ្ណោះរវាងព្រះអង្គ និងទូលបង្គំ ។ សូមព្រះអង្គគង់នៅទីនេះ ហើយដើម្បីជួយខ្ញុំក្នុងការបង្រៀនសិស្សផង!" ចំណែក ព្រះសិទ្ធត្ថវិញ ទ្រង់មានព្រះបន្ទូលសួរថា: "តើនៅមានវិជ្ជាអ្វីបង្រៀនអាត្មាទៀតទេ លោកគ្រូ? តើលោកគ្រូមិនអាចប្រាប់អាត្មាអំពីរបៀបគេចចេញឱ្យផុតពីការចាស់, ឈឺ, ស្លាប់បានឬទេ?" ។ អារទកាលាមៈតាបសនៅស្ងៀម ដោយមិនអាចឆ្លើយបាន ព្រោះគាត់បានបង្រៀនព្រះសិទ្ធត្ថនូវចំណេះវិជ្ជាដែលគាត់មានទាំងប៉ុន្មានអស់ពីក្នុងខ្លួនហើយ ។ (តទៅលេខក្រោយ)

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

**98-** Siddhartha continued: If human being expect mercy, they ought to show mercy, for, according to the law of cause and effect, those who kill will, in turn, be killed. In short, if we expect happiness in the future, we must do no harm to any kind of creature whatsoever. For whoever sows the seeds of sorrow and agony will undoubtedly reap the same fruits."



**99-** the manner in which Siddhartha spoke to the King, the fire-work shippers and the people of Rajagrha was peaceful and elegant and full of compassion yet, at the same, forceful and determined. He completely changed the intention and belief of the King and the fire-work shippers. So King Bimbisara again asked Siddhartha to stay in his country to teach the people to be merciful and to protect animals. Siddhartha was deeply grateful to the King for his offer, but since he had not yet attained his goal of complete enlightenment, he once again gracefully declined the invitation and departed.



**100-** Leaving Rajagrha, Siddhartha journeyed on toward the place where Arada-kalama the sages, lived. Arada-kalama was one of the best known scholars of that time, who had founded many institutes for learning of all kinds. Siddhartha stayed with Arada-kalama and studied very diligently under him. Soon his knowledge and capability could be favorably compared to his teacher's, and he became recognized as a prominent and virtuous disciple of the old sage, a situation which made Arada-kalama very happy.



**101-** One day Arada-kalama said to Siddhartha: "Now you know everything that I know and you are able to teach as well as I can. What I know you know equally well. There is little difference between us. Stay here and help me teach the students" Siddhartha asked: "Don't you have anything else to teach me, Master? Can't you tell me how to escape from old age, sickness and death?" Arada-kalama made no reply, for he had taught Siddhartha all that he knew. *(Continued After Issue)*



# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

●ពីមុនគេរស់នៅតែក្នុងបន្ទប់ទី១ប៉ុណ្ណោះ ឥឡូវគេមានពរក្នុងខ្លួន ហើយសតិគេលោតផ្លោះឆ្លងចុះឆ្លងឡើងៗតាមសភាពការណ៍ខាងក្រៅតម្រូវ ។ សភាពបែបនេះប្រព្រឹត្តទៅពេញមួយជាតិ ឬបន្តរបៀបនេះជាច្រើនជាតិទៅមុខទៀត តាមទំហំកម្មក្រាស់ ឬស្តើង ច្រើន ឬតិច ។ នេះជាដំណាក់កាលនៃការរំលាយកម្មក្រាស់ និងសំអាតចិត្តឱ្យផូរផង់ ឱ្យបរិសុទ្ធ ។ ក្នុងដំណាក់កាលនេះ មនុស្សពុំទាន់រំដោះបានទាំងស្រុងនៅឡើយ ជាដំណាក់កាលកសាងខ្លួន ។

**(ទី៣) មនុស្សបានរួចរំដោះពីកម្មទាំងស្រុង :**

ក្រោយពីបានឆ្លងកាត់ដំណាក់កាលកសាងខ្លួនជាច្រើនជាតិមកនៅក្នុងកំណើតចុងក្រោយ មនុស្សនេះបន្តរស់នៅដូចយើងជាមនុស្សធម្មតា : បរិភោគអាហារ ដេក ដើរ ឈរ អង្គុយ ធ្វើទំនាក់ទំនងនឹងមនុស្សនានាដោយនិយាយពន្យល់ ។ល។ អ្វីដែលលើសអំពីមនុស្សធម្មតានោះ គឺមនុស្សនេះរស់នៅក្រៅប្រព័ន្ធម៉េម៉ូរីទាំងស្រុង បន្ទប់ម៉េម៉ូរី ( ដំណាងបុគ្គល) នៅមានអត្ថិភាពដែរ តែតូចបំផុត ពោលគឺត្រឹមតែសំរាប់ដឹកនាំជីវិតឱ្យមានដំណើរការបានឱ្យញ្ញាណទាំង៥ បន្តសកម្មភាពបាន ។ កុងស្យេនិសបរិសុទ្ធបានរីក និងភ្លឺថ្លាចែងចាំងពណ្ណរាយ មានអំណាចគ្របដណ្តប់មកលើបន្ទប់ម៉េម៉ូរីទាំងស្រុង (Predominant power of pure consciousness over life) ។ ការពូតផ្តុំ និងកំណរកំណើតកម្លាំងកម្មត្រូវបញ្ឈប់ទាំងស្រុង ។

ឧទាហរណ៍ : ក្រោយពីបានសំរេចការត្រាស់ដឹងសម្មាសម្ពោធិញាណជាស្ថាពរ ហើយព្រះពុទ្ធបន្តរស់នៅផ្សព្វផ្សាយទ្រឹស្តីព្រះពុទ្ធសាសនា និងបច្ចេកទេសសមាធិរហូតដល់ទ្រង់ចូលបរិនិព្វាន ។ ព្រះអង្គរកឃើញសច្ចធម៌ កុងស្យេនិសបរិសុទ្ធ ដែលមាននៅក្នុងរូបកាយជាមនុស្សយើងម្នាក់ៗគ្រប់ៗគ្នា ហើយមានសារៈសំខាន់ដ៏លើសលប់សំរាប់សុភមង្គលរបស់មនុស្សជាតិ ។ ទ្រង់បានព្យាយាមបង្ហាត់បង្រៀនបច្ចេកទេសមាតិាស្វែងរកសច្ចធម៌នេះ តាមរូបមន្ត សីល សមាធិ បញ្ញា នេះ ។

និយាយដល់បរិនិព្វាន មានន័យថាព្រះអង្គលែងកើតជាមនុស្សទៀតហើយ ពីព្រោះបន្ទប់ម៉េម៉ូរីអស់សកម្មភាព លែងមានថាមពល ឬកម្លាំងជំរុញជាបុព្វបទសំរាប់ជាតិខាងមុខឡើយ ។ ពិភពចិត្តរបស់ទ្រង់មានភាពបរិសុទ្ធពេញលេញ ។

តាមលិទ្ធិព្រាហ្មណ៍ គេពន្យល់បាតុភាពបរិនិព្វាននេះដូចតទៅ : បាតុភូតដែលលេចឡើងក្នុងចក្រវាឡយើងនេះ (ធម្មជាតិទាំងអស់) ព្រះអាទិត្យ ផ្កាយ មេឃ សមុទ្រ ផែនដី ភ្នំ ព្រៃព្រឹក្សា រុក្ខជាតិ សត្វ មនុស្ស ។ល។ ទាំងអស់នេះសុទ្ធតែមានរូបកាយឋិតនៅក្រោមច្បាប់ កើត រីក លូតលាស់ និងរលាយសាបសូន្យត្រឡប់ទៅវិញ កើតស្លាប់ៗក្នុងវាលវដ្តសង្សារតៗពុំឈប់ឈរឡើយ ។ ទាំងអស់នេះឋិតនៅក្នុងជំពូកសភាពរ៉ុឡាទីវ ប្រៀបដូច ទឹករាវ ទឹកកក និងចំហាយទឹក ដូច្នោះឯង ។ ពីខាងក្រោយបាតុភូតខាងលើនេះ (ជាដៃគូ) មានអត្ថិភាពកុងស្យេនិសបរិសុទ្ធមួយ ដ៏ធំមហិមា ក្តោបរួម Global ដែលមានលក្ខណៈ ជាអរូបបីយ បុព្វហេតុ សក្តានុពលសភាពពេញលេញ មានអត្ថិភាពជាអនន្ត (ប្រៀបដូចជាជីវិត H2O ក្នុងបាតុភូតទឹកដែលខ្ញុំរៀបរាប់ពីមុន) កុងស្យេនិសដ៏ធំនេះ ជាកុងស្យេនិសបរិសុទ្ធមេ មានជីវិតជាអមតៈ លែងមានកើតមានស្លាប់ គ្មានទីចាប់ផ្តើម គ្មានទីបញ្ចប់ ។ ក្នុងព្រហ្មញ្ញសាសនា កុងស្យេនិសបរិសុទ្ធមេនេះ ឱ្យឈ្មោះថាជាព្រះអាទិទេព ដែលគ្រប់គ្រងពិភពចក្រវាលយើងនេះ និងអត្ថិភាពគ្រប់កន្លែង គ្មានខ្វះចន្លោះទីណាឡើយ មានប្រាជ្ញាញាណបរិសុទ្ធ ហើយនិងមនុស្សគ្រប់រូបអាចពិសោធឃើញព្រះអាទិទេពពិតប្រាកដក្នុងខ្លួនម្នាក់ៗតែម្តង។

នៅក្នុងខ្លួនមនុស្សមានកុងស្យេនិសមួយទៀតដែលមានទ្រង់ទ្រាយតូចជាបុគ្គល ។ ជាធម្មតាកុងស្យេនិសតូចនេះត្រូវជោកជាំ ឬប្រឡាក់ប្រឡូសដោយកម្ម តាមដំណើរក្នុងវាលវដ្តសង្សារ ។ លុះមនុស្សខិតខំព្យាយាមកសាងខ្លួនតាមវិធីសមាធិផ្សេងៗ កម្មនេះត្រូវជ្រុះ ហើយកុងស្យេនិសតូចនេះត្រូវបានសំអាតឱ្យផូរផង់ឡើងៗ ឱ្យបរិសុទ្ធឡើងៗ វាប្រែជាបរិសុទ្ធពេញលេញ ។ នៅពេលដែលព្រះពុទ្ធចូលបរិនិព្វាន កុងស្យេនិសដ៏បរិសុទ្ធរបស់ទ្រង់ បានជ្រាបចូលទៅក្នុងកុងស្យេនិសបរិសុទ្ធមេ ហើយក៏ត្រូវស្រូប និងប្រែទៅជាកុងស្យេនិសមេតែម្តង ព្រះអង្គចេញផុតពីវាលវដ្តសង្សារ លែងកើត លែងស្លាប់ទៀតហើយ ។ អ្នកប្រាជ្ញសាសនាប្រៀបធៀបបាតុភូតជ្រាបចូលក្លាយជាកុងស្យេនិសមេនេះទៅនឹងឧទាហរណ៍ :

(១)-បើគេចាក់ទឹកបរិសុទ្ធទៅលើទឹកបរិសុទ្ធ ទឹកទាំងពីរប្រភេទស្រូបចូលរួមគ្នាទៅជាទឹកបរិសុទ្ធតែមួយ ។ (២)- មនុស្សម្នាក់យកអំបិលមកពូតផ្តុំ និងឆ្លាក់ជារូបកូនក្រមុំតុក្កតា ហើយគាត់មានជំនឿថា រូបចម្លាក់នេះអាចឱ្យគាត់មានលទ្ធភាពវាស់ស្ទង់កំរិតធាតុអំបិលក្នុងទឹកសមុទ្រ ។ គាត់បានបោះតុក្កតានោះទៅក្នុងសមុទ្រ តុក្កតាក៏រលាយក្លាយទៅជាសមុទ្រទាំងស្រុង ។

ក្រោយសម័យព្រះពុទ្ធមានមនុស្សជាច្រើនទៀតបានសំរេចការត្រាស់ដឹង ។ រហូតដល់ពេលបច្ចុប្បន្ននេះ តាមការស្រាវជ្រាវឯកសារនានា ខ្ញុំរកឃើញឈ្មោះមហាឥសីពីរអង្គបានសំរេចការត្រាស់ដឹងនោះ គឺទី១ ព្រះមហាឥសី ស្រីរមណ មហាឫសី (Sri Ramana Maharshi ១៨៧៩-១៩៥០) និង មហាឥសី ស្រីរាមាក្រិស្នា (Sri Ramakrishna) ។ មានឯកសារជាច្រើនបានចងក្រងទុកបង្ហាញអំពីការរស់នៅរបស់មហាបុរសទាំងពីរអង្គនេះ។

**(៥) ការពិសោធន៍ក្នុងសមាធិ**

បើនរណាម្នាក់សួរខ្ញុំថា ឪតើអ្នកពិសោធឃើញខ្មោច ព្រាយ បិសាច ឬឋានសួគ៌ ឋាននរកដូចខ្មែរយើងខ្លះបាននិយាយតៗគ្នាមកឬយ៉ាងណានៅពេលសមាធិ ? តើសមាធិនាំផលអ្វីដល់អ្នកនៅពេលឥឡូវនេះ ? ឱ ។

(តទៅលេខក្រោយ)

តមកទំព័រទី ០៦

## សោកនាដកម្មនៅលើស្ពានពេជ្រ...

ដោយអុចទៀនធូបបំពាក់កំរងផ្កា និងធ្វើការគោរពវិញ្ញាណក្ខ័ន្ធឧទ្ទិសដល់អ្នកដែលបានបាត់បង់ជីវិតនៅលើស្ពានពេជ្រនៃឯមជ្ឈមណ្ឌលកោះពេជ្រ ឱ្យទៅកាន់សុគតិភពកុំបីឃ្លៀងឃ្លាតឡើយ។ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ក៏បានប្រកាសឱ្យបង្កើតនូវគណៈកម្មាធិការស៊ើបអង្កេតជាបន្ទាន់ ដែលមានលោក ឱម យិនទៀង ជាអនុប្រធានគណៈកម្មការទទួលបន្ទុកដោះស្រាយនូវករណីឧបទ្ទវហេតុលើស្ពានពេជ្រ។

បណ្តាញទូរទស្សន៍ចំនួនពីរ គឺស៊ីធីអ៊ិន និងទូរទស្សន៍បាយ័ន បានផ្សាយបន្តផ្ទាល់ពីព្រឹត្តិការណ៍ និងធ្វើការអង្គាសបច្ច័យសំរាប់ជួយឧបត្ថម្ភដល់ជនរងគ្រោះ។ ទឹកប្រាក់បណ្តោះអាសន្នរបស់មូលនិធិបាយ័ន គិតត្រឹមថ្ងៃ២៩ ខែវិច្ឆិការនេះ មានចំនួន ១.២៥០.១៨៥ ដុល្លារអាមេរិក និងប្រាក់រៀលចំនួន ២.៤៥៥.៥៤៧.៧០០រៀល សប្បុរសជនដែលចូលរួមឧបត្ថម្ភមានជនរួមជាតិ ក្នុងប្រទេសក៏ដូចជាក្រៅប្រទេស ព្រះសង្ឃ ជនបរទេសក្នុងស្រុក និងអ្នកទេសចរណ៍ បណ្តាអង្គការក្រៅរដ្ឋាភិបាលនានា និងក្រុមហ៊ុនឯកជន ស្ថានទូត ក៏ដូចជាប្រទេសជិតខាងផងដែរ រួមមានប្រទេសថៃ ប្រទេសចិន ប្រទេសវៀតណាម ប្រទេសបារាំង ប្រទេសអាមេរិក។ល។ រាជរដ្ឋាភិបាលបានឧបត្ថម្ភដល់ក្រុមគ្រួសារសពក្នុងមួយនាក់ៗចំនួន៥លានរៀល ដែលស្មើនឹង ១.២៥០ដុល្លារអាមេរិក រីឯថវិការសាលាក្រុងរាជធានីភ្នំពេញដែលដឹកនាំដោយលោក កែបឈុតិមា បានឧបត្ថម្ភ៥០ម៉ឺនរៀលឱ្យបន្ថែមពីលើនេះ កាកបាទក្រហមកម្ពុជា ដែលដឹកនាំដោយលោកជំទាវ ប៊ុនរ៉ានីហ៊ុនសែន និងគណៈប្រតិភូ បាននាំយកអំណោយមកប្រគល់ជូនក្រុមគ្រួសារសពដល់គេហដ្ឋានដែលមានទីលំនៅនៅរាជធានីភ្នំពេញ និងបានអុចធូបសំដែងនូវការសោកស្តាយដល់ជនរងគ្រោះដែលក្នុងមួយនាក់ទទួលបាន ១.១៥២ ដុល្លារអាមេរិក អំណោយនេះបានមកពីកាកបាទក្រហមចិន ធនាគារ វិនិយោគ និងអភិវឌ្ឍន៍វៀតណាម និងសមាគមវិនិយោគវៀតណាម-កម្ពុជា លោកបណ្ឌិត ហារុហ៊ីសា-ហាន់ដា និងឯកឧត្តម គាសាន់អ៊ីលយុមស៊ីណូ។ ចំណែកឯគ្រួសារជនរងគ្រោះនៅតាមបណ្តាខេត្តនានា និងរាជធានីភ្នំពេញ ត្រូវបានទទួលអំណោយឧបត្ថម្ភជាបន្តបន្ទាប់។





ពាក្យចចាមអារ៉ាមដែលធ្វើឱ្យអ្នកស្រុកចលាចលចាននិយាយតៗគ្នាថា អ្នកដែលកើតឆ្នាំខាល ឆ្នាំរកា ឆ្នាំចត្រូវទៅស្រោចទឹកគ្រប់គ្នា ដើម្បីបញ្ចៀសនូវគ្រោះចង្រៃផ្សេងៗ។ ពាក្យចចាមអារ៉ាមមានមិនចេះចប់ដែលធ្វើការផ្សព្វផ្សាយឱ្យសែនព្រេនផ្លែឈើ និងគ្រឿងសក្ការៈ អ្នកលក់ចេកខ្លះបានតំឡើងតំលៃចេកមួយស្និតដែលតំលៃធម្មតាត្រឹមតែ២.០០០រៀលឡើង រហូតដល់ ៣០.០០០រៀល និងតំឡើងសសៃករដាក់គ្នារវាងអ្នកទិញ និងអ្នកលក់ ព្រោះមិនបានចេកលក់ឱ្យគ្រប់គ្នា ពេលនោះចេកត្រូវបានលក់អស់គ្មានសល់ក្នុងមួយពព្រិចភ្នែក។ ទិដ្ឋភាពជាក់ស្តែងនាយប់ថ្ងៃទី២២ និង២៣ នៅមុខផ្ទះប្រជាពលរដ្ឋស្ទើគ្រប់គ្នាបានរៀបចំសែនព្រេនដាក់ចេក អង្ករ អំបិល និងអុចធូប និងទៀនបំភ្លឺទៅតាមអបិយជំនឿ ហើយបើតាមសម្តីរបស់អ្នករស់នៅភ្នំពេញមួយចំនួនបាននិយាយថា ពួកគាត់មិនមានអ្វីជាប់សាច់ញាតិនឹងអ្នករងគ្រោះនោះទេ ប៉ុន្តែជាជនជាតិខ្មែរដូចគ្នា ហើយពួកគាត់បានរៀបចំសែនព្រេននេះ ដើម្បីបញ្ចៀសនូវដួងវិញ្ញាណអ្នកដែលនៅវិលវល់លើភពយើងនេះ ឱ្យទៅកាន់សុគតិភពកុំឱ្យមកតាមអុកឡុកអ្នកស្រុកយើងណាម្នាក់ឡើយ។

ប្រទេសកម្ពុជា តែងតែប្រារព្ធពិធីបុណ្យអុំទូក អកអំបុក សំពះព្រះខែ បណ្តែតប្រទីប ចំនួនបីថ្ងៃគឺនៅថ្ងៃទី២០ ដល់ថ្ងៃទី២២ ខែវិច្ឆិកាជារៀងរាល់ឆ្នាំ ប្រជាពលរដ្ឋខ្មែរគ្រប់រូបបានឈប់សំរាកពីការងារដើម្បីទៅកំសាន្តនៅរមណីយដ្ឋាននានា។ ប្រជាជនខ្មែរជាងបួនលាននាក់ជាពិសេសគឺអ្នកនៅតាមជនបទបានធ្វើដំណើរពីតាមខេត្តមកប្រមូលផ្តុំគ្នាយ៉ាងកុះករនៅរាជធានីភ្នំពេញ បណ្តើរគ្នាជាក្រុមៗយ៉ាងកកកុញ មានមនុស្សច្រើនរាប់ពាន់នាក់បានបណ្តើគ្នាដើម្បីទៅទស្សនារមណីយដ្ឋានកោះពេជ្រ ដោយដើរឆ្លងតាមស្ពានពេជ្រ ដែលក្រោយថ្ងៃទី២២ ខែវិច្ឆិកា ត្រូវបានប្រជាជននិយមហៅថា ស្ពានមរណៈ រឺស្ពានមច្ចុរាជ ដែលទើបតែសម្ភោធឱ្យឆ្លងកាត់ជាផ្លូវការក្នុងឱកាសបុណ្យអុំទូកនេះតែងម្តង ៕

### ព័ត៌មានចុងក្រោយ

លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បានប្រកាសផ្តល់ជំនួយចំនួន ១២.០០០ ដុល្លារអាមេរិកដល់ក្រុមគ្រួសារនៃសពនីមួយៗ។

ថ្ងៃទី០៨ ខែវិច្ឆិកា ឆ្នាំ២០១០នេះ រដ្ឋាភិបាលបានប្រារព្ធសម្ភោធនូវសមិទ្ធផលនៅមណ្ឌលកំសាន្តកោះពេជ្រ និងស្ពានពេជ្រដែលមនុស្សទើបតែស្លាប់រាប់រយនាក់នោះផងដែរ ៕

ទស្សន៍ទាយជោគតារាសី

# ជោគជតារាសីលោកអ្នក ថ្ងៃទី០៣-២៣ធ្នូ ឆ្នាំ២០១០

### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដើងខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកម្លោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕

### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕

### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើ ចូរបេះពិនិត្យមើលឲ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នក្រែងមានអ្នកក្រោមកញ្ជះញង់ ៕

### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ រយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយលក្ខណ៍អក្សរដោយ មានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី៕

### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបការងារ អ្វីក៏ដោយចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរបេះអត់ធ្មត់ និងរម្ងាប់ ចិត្តឲ្យបាន ត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុង រយៈពេល នេះច្រើនពាក់មុខយក្សដាក់គ្នា ៕

### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរីបៗបន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមត្រជាក់មកលួងលោមបំពងបោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវជាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕

### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តីតែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេកហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែបេះអត់ឱនឲ្យគ្នាទៅវិញទៅ មកទើបមិនអាចប្រេះឆាគ្នាបាន ៕

### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើងចូរបេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់។ ស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីបំប៉ាច់បំប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីជ្រៀតជ្រែកនៅក្នុងគ្រួសារ៕

### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ ។ ចំពោះគូស្នេហ៍មានភាពល្អកល្អឺនយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឲ្យសោះ ជាពិសេសបើមានមនុស្សចម្លែកយករបស់របរមានតម្លៃមកបញ្ចាំ ឬលក់ដោយធូរថ្លៃក៏មិនត្រូវទទួលឬទិញយកដែរ ប្រយ័ត្នជាន់ដានចោរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវចុះសម្រុងគ្នាប៉ុន្មានទេ ៕

### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ក្នុងរយៈពេលនេះ បុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមត្រជាក់អាចរលាយទ្រព្យឆាប់ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

# វិធីទាំត្រគាកឱ្យមានរាងស្អាត

សំរាប់សុភាពស្ត្រីដែលមានត្រគាកមិនស្អាតមិនមូលក្បំ នោះសាកល្បងធ្វើតាមវិធីណែនាំខាងក្រោមនេះធានាថា នាងនឹងមានត្រគាកមូលក្លំស្រស់ស្អាតមិនខាន ។ វិធីទីមួយ ហាត់ប្រាណដោយការរាំ រត់ ឬធាក់កង់ ។ ការហាត់ប្រាណទាំងបីវិធីនេះ វាជួយឲ្យត្រគាកមានរាងស្អាតណែន ហើយកាន់តែក្បំជាងមុនដោយមិនកំណត់ថាជាស្រីធាត់ ឬស្រីស្គមក៏អាចធ្វើបានដូចគ្នាទាំងអស់ ។ វិធីពីរ គ្រប់គ្រងអាហារដោយគ្រាន់តែទទួលទានឲ្យឆ្អែតល្មមកាត់បន្ថយអាហារផ្តល់ថាមពលខ្ពស់ អាហារមានរសជាតិផ្អែមមុត ខ្លាញ់ច្រើន ទទួលទានទឹកដោះគោជាប្រភេទគ្មានខ្លាញ់ និងទទួលទានសណ្តែកផ្សេងៗ ទុកជាអាហារកំដរពោះពេលទំនេរ ។ វិធីទីបីឧស្សាហ៍ម៉ាស្សាបរិវេណគល់ភ្លៅខាងលើផ្នែកខាងមុខ និងខាងក្រោយជាពិសេសត្រង់ចំណែកដែលតភ្ជាប់ពីសាច់កំប៉េះគូទចុះមកក្រោមទើបអាចជួយដោះស្រាយបញ្ហាធ្លាក់កំប៉េះគូទបាន ។ សំរាប់ពេលម៉ាស្សាណែនាំឲ្យប្រើក្រែមកំចាត់ខ្លាញ់នៅក្រោមស្បែកមុនពេលឈ្លីម៉ាស្សាតែទាមទារឲ្យធ្វើជាប់គ្នាមិនដាច់ទើបឆាប់ឃើញផលល្អ ។

ចំពោះពេលវេលាម៉ាស្សាណែនាំឲ្យជ្រើសរើសពេលមុនគេង និងក្រោយពេលងូតទឹកព្រឹករួចដោយគួរឈ្លីមុនពេលទទួលទានអាហារមួយម៉ោងទើបល្អ ។ វិធីទីបួន គឺការខាត់ស្បែកវិធីនេះក្រៅពីជួយឲ្យត្រគាកបានស្អាតហើយនោះ ក៏ជួយឲ្យស្បែកបានស្អាតផងដែរ។

សំរាប់វិធីខាត់ ណែនាំឲ្យប្រើអំបិលគ្រាប់ដាក់ចូលទៅក្នុងដបកែវ ប៉ាន់ស្មានបរិមាណទៅតាមតំរូវការ ។ បន្ទាប់មកចាក់ប្រេងម្នាក់ចូលរួច ឃ្លាំសង្កេតមើលថាប្រេងម្នាក់នោះជ្រាបចូលទៅក្នុងអំបិលរហូតដល់អស់ហើយនោះ ទើបចាប់ផ្តើមបន្ថែមក្លិនដែលខ្លួនឯងចូលចិត្ត បន្ទាប់មកទើបយកអំបិលនោះមកខាត់ជារង្វង់នៅលើបរិវេណត្រគាក ៕

សោភ័ណភាព

# កុំដករោមចិញ្ចើមញឹកញាប់ពេក

ប្រសិនបើអ្នកដករោមចិញ្ចើមញឹកញាប់ពេកនឹងធ្វើឲ្យរោមចិញ្ចើមដុះមកជំនួយវិញយឺតយ៉ាវបំផុត។ មួយវិញទៀត ការដករោមចិញ្ចើមម្តងហើយម្តងទៀតនេះក៏ជាទង្វើមួយបំផ្លាញឫសសក់ផងដែរ ។ ដូច្នេះផលប៉ះពាល់ក្រោយពីដុះឡើងយឺតយ៉ាវហើយនោះ នៅទីបំផុតវានឹងលែងដុះឡើងតទៅទៀតមិនខាន ។ ដូចនេះគួរធ្វើក្នុងលក្ខណៈមួយដែលសមរម្យដើម្បីការពារការបាត់បង់កោសិកានោះឯង ៕

# ការពារពីការលេងទឹកសមុទ្រ

សុភាពស្ត្រីទាំងឡាយ នាងមានដឹងខ្លះឬទេថា ក្នុងអំឡុងពេលនាងឈប់សម្រាកលំហែកាយនៅក្នុងរដូវក្តៅ ដោយការធ្វើដំណើរទៅកំសាន្តនៅតាមតំបន់ឆ្នេរសមុទ្រមានខ្សាច់ពណ៌សដ៏ស្រស់ស្អាតនោះ ជាការពិតណាស់ថា កំដៅថ្ងៃរមែងជះផលអាក្រក់ប៉ះពាល់ដល់ស្បែកដ៏ផូរផង់របស់អ្នកដោយចៀសមិនផុត ។

ប្រសិនបើអ្នកមិនចង់ឲ្យស្បែកក្រៀមខ្លោចដោយសារតែរងនឹងកំដៅថ្ងៃក្នុងពេលលេងទឹកសមុទ្រទេនោះ សូមចងចាំទុកចុះថា មិនគួរងូតទឹកដោយប្រើសាប៊ូតែគួរប្រើវិធីលាងជម្រះកាយដោយប្រើទឹកក្តៅឧណ្ហៗជំនួសវិញ ។ បន្ទាប់ពីប្រើទឹកក្តៅឧណ្ហៗរួច ទើបប្រើទឹកត្រជាក់តាមក្រោយ ហើយជូតខ្លួនឲ្យស្ងួត ទើបប្រើឡូសិនលាបតាមក្រោយម្តងទៀត ទើបអាចជួយការពារអាការក្រៀមខ្លោចនៅលើស្បែកបាន ។ លើកនេះដំណើរកំសាន្តរបស់អ្នកលែងមានការភ័យបារម្ភពីរឿងសុខភាពស្បែកទៀតហើយ ៕

# Khmer Post Classified

To Place an ad, call (267) 253-3947
e-mail KhmerPostUSA@gmail.com



## MENG´S CLEANERS

454 E. Wyoming Avenue. Philadelphia, Pa 19120. Tel. 215-329-2593

ហាងយើងមានកាត់ដេរសំពត់អាវ ច្រើនម៉ូដ និងកែសម្រួលជូនបាន

WE NOW DO CUSTOM DESIGN TAILORING AND ALTERATIONS

-ហាងយើងមានជំនាញខាងកាត់ដេរតាមម៉ូដ បូរាណ ឬសម័យ
-យើងមានជំនាញកាត់ដេរតំរូសំពត់អាវតូចធំ បានតាមការស្រម័យ
-យកក្រណាត់មកឱ្យយើងដេរ ឬក៏ទិញ

PLEASE CALL CHANY SOT 215-329-2593 សូមទូរស័ព្ទរក **ឆនី សុត្ថ** នៅលេខ (215) 329 2593 ដើម្បីពិគ្រោះ

## ដំណឹងរកអ្នកធ្វើការ

LOOKING FOR A YOUNG & HEALTHY WORKER TO WORK IN A FISH MARKET IN NORTH PHILADELPHIAAREA. LITTLE ENGLISH SKILLS REQUIRED. PLEASE CALL **215-971-3774** FOR APPLICATION.

យើងរកអ្នកធ្វើការនៅក្មេង សុខភាពល្អ ដើម្បីបំរើការផ្នែកទីផ្សារលក់ត្រី ដែលស្ថិតនៅខាងជើងហ្វីឡាដែលហ្វៀ និយាយភាសាអង់គ្លេសឱ្យបានបន្តិចបន្តួច សូមទូរស័ព្ទទៅ **215-971-3774** ដើម្បីដាក់ពាក្យសុំចូល

## លក់ ឬជួលភោជនីយដ្ឋាន

## OPEN CAMBODIAN RESTAURANT

-Northeast Philly- PA 5th & Chew. Closed Korean Rest. Furniture & 3 bedrooms on 2nd flr. Lease/buy the business & property. All restaurant equipments are in placed and ready to open business anytime.

Call Peter 215-668-1666

## IN WICHTA FALLS TEXAS

**មានហាង LIQUOR នៅរដ្ឋ TEXAS ត្រូវការលក់ទាំងអគារទាំងដីរួមទាំងកន្លែងលាងឡានមួយទៀតផង ក្នុងតម្លៃ $690.000 (អាចនិយាយតម្លៃគ្នាបាន)**

Excellent location, including land.
Liquor business (1,500 square feet), and new car wash.
Big Corner lot, good visibility, additional building can be added.
Drive through, short hour Check cashing/lottery/western union
Take home $14,000 per month income
Asking $690,000+inventory (negotiable)

Please Call Rick : 940-337-7633 (Cell), 940-687-9988 (Store)

## ផ្ទះ Duplex តម្លៃ $80.000

នៅជ្រុងផ្លូវ 12Th st. និង Ruscomb st.
North Philadelphia
ផ្ទះធ្វើរួចហើយ. បង្អួចថ្មី.
ចង្ក្រានបាយ និងដំបូល
រៀបជាបន្ទប់ អាចនៅបានបីគ្រួសារ
ឥឡូវនេះមានពីរគ្រួសាររស់នៅ.
ដែលបង្កើតប្រាក់ចំណូលបានភ្លាម

ទូរស័ព្ទ : ពៅ ឆាយ 267-258-6841

## AUTO GARAGE FOR SALE

HASS´S AUTO ជួសជុលតួឡានដែលបុកគ្នាម្ចាស់ហាងចូលនិវត្តន៍
-ហាងមានដំណើរការ១៧ឆ្នាំមកហើយ -ពាណិជ្ជកម្មមានល់នឹងល្អគ្រប់រដូវលោកអ្នកអាចទិញតែពាណិជ្ជកម្មក៏បាន -ទិញដីជាមួយនឹងផ្ទះក៏បាន
-ទិញទាំងពីររួមគ្នាក៏បាន បើចង់ដឹងច្បាស់
សូមទូរស័ព្ទរកឈ្មោះ "នីក"

17 years well established business.

Please Call Nick : 267-242-7938 For Showing

## ប័ណ្ណជាវកាសែតខ្មែរប៉ុស្តិ៍

ឈ្មោះ និងអាស័យដ្ឋានរបស់

ឈ្មោះ :...........................................................

អាស័យដ្ឋាន : ...................................................

**ខ្ញុំចង់ជាវ :**

☐ កាសែតខ្មែរប៉ុស្តិ៍ ១ខែ មាន២លេខ ៦ខែ $30 ១២ខែ $60ឬ $70 អ៊ីរ៉ូ សម្រាប់អ៊ឺរ៉ុប
☐ សៀវភៅរឿងព្រេង ..............................តម្លៃ $..................
☐ ស៊ីឌីប្រវត្តិសាស្ត្រខ្មែរ ៤ ម៉ោង តម្លៃមួយសិត $30
ខ្ញុំភ្ជាប់សែក ឬ មនិអដ័រ មក U.A.M.G តម្លៃ $....................
ផ្ញើមក U.A.M.G 438 LINDLEY AVE. PHILADELPHIA, PA 19120
**Phone : 267-253-3947**

## ឱសថស្ថានខ្មែរ

Sav-Mor PHARMACY Tel: 215-467-1220

Sav-Mor PHARMACY
**Sam EA R.Ph.**
2232 S. 7th. (7th & Wolf) Philadelphia, PA 19148
Tell: (215) 467-1220 Fax: (215) 467-1447

**បំរើលោកអ្នកដោយមិត្តភាព និងទន់ចិត្ត**

- Sav Mor គឺជាឱសថស្ថានបំរើការចែកចាយថ្នាំ ហើយអាចពន្យល់ពីរបៀបប្រើប្រាស់ថ្នាំតាមវេជ្ជបញ្ជាជាភាសាខ្មែរបាន
- យើងទទួលយកនូវ MEDICARE MEDICAID និង INSURANCES ជាច្រើនទៀតផង យើងមានលក់កាត់សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ និងអន្តរជាតិ

- ccept most insurance plans including Medicare & Medecaid
- Easy Prescription transfer
- Inside. Prepaid phone card. Call Cambodia.



គណបក្សសិទ្ធិមនុស្ស
Human Rights Party
បំរើ ការពារ កសាង



# សាររំលែកទុក្ខ

យើងខ្ញុំទាំងអស់ជាសមាជិក សមាជិកា នៃសាខាគណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋផែនស៊ីវេនៀរ (PA) និងរដ្ឋញូជើស៊ី (NJ) សូមចូលរួមរំលែកទុក្ខយ៉ាងក្រៀមក្រំចំពោះមហាសោកនាដកម្មនៅលើស្ពានទៅកាន់កោះពេជ្រ នាថ្ងៃទី ២២ ខែ វិច្ឆិកា ឆ្នាំ ២០១០ កន្លងមកនេះ ដែលបណ្តាលឱ្យមានមនុស្សស្លាប់ជិត ៤០០ នាក់ និងរងរបួសមួយចំនួនធំ ។

ក្នុងហេតុការណ៍ដ៏គួរឱ្យរន្ធត់នេះ សកម្មជននៃសាខាគណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋ PA និងរដ្ឋ NJ សូមបួងសួងដល់វិញ្ញាណក្ខន្ធអ្នកស្លាប់ក្នុងហេតុការណ៍នោះឱ្យបានទៅដល់ឋានសុគតិភព និងសូមឱ្យអ្នករងរបួសឆាប់ជាសះស្បើយ ដើម្បីប្រកបរបរចិញ្ចឹមជីវិត និងតាមគ្រួសាររៀង១ខ្លួន ។ ហើយក៏សូមបួងសួងកុំឱ្យហេតុការណ៍ដ៏ចង្រៃឧបាតបែបនេះ កើតឡើងនៅលើដែនដីសុវណ្ណភូមិរបស់យើងទៀត ។

* សូមជម្រាបថា ថ្មី១នេះសាខាគណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋ PA បានធ្វើបុណ្យមួយដើម្បីប្រមូលថវិកាជួយដល់ក្រុមគ្រួសារអ្នកស្លាប់ និងរបួសនៅកោះពេជ្របានចំនួន ៩៥០ ដុល្លារ និងនៅរដ្ឋ NJ បានចំនួន ៧៥០ ដុល្លារ ។

(បើលោកអ្នកចាប់អារម្មណ៍ជាមួយគណបក្សសិទ្ធិមនុស្ស សូមចូលទៅកាន់គេហទំព័រ WWW.HRPCAMBODIA.INFO ឬទាក់ទងផ្ទាល់ជាមួយលោក វ៉ា សាម៉ុន តាមរយៈ ទូរស័ព្ទលេខ (២១៥) ៤១០-២៥៧៤ ) សូមអរគុណ !

ហ្វីឡាដែលហ្វៀ ថ្ងៃទី ០១ ខែ ធ្នូ ឆ្នាំ ២០១០